សារព័ត៌មាន ខ្មែរប៉ុស្ដិ៍ ស.រ.អា
KhmerPost USA
E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 978-942-1641

មាតិការឿង
Issue 186 Oct.9th. to 23rd. 2015

Free



Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

# លទ្ធផលនៃការបោះឆ្នោតសមាជិកក្រុមប្រឹក្សាក្រុង

## Lowell City Council Prelimary Election Results

**ដោយ ពិន សំខុន** រូបថត Lowell Votes

លទ្ធផលនៃការបោះឆ្នោតបឋមសម្រាប់ក្រុងឡូវែលបានធ្លាក់មកនៅម៉ោង៩យប់នៃថ្ងៃអង្គារទី ២៩.៩.១៥ ក្នុងចំណោមអ្នកដែលបានចុះឈ្មោះចំនួន៥៨៨៧៨នាក់មានអ្នកដែលបានទៅបោះឆ្នោត តែចំនួន៣៩៣៩នាក់ប៉ុណ្ណោះបានបោះឆ្នោតឱ្យតាមលំដាប់មាន :



**កំណត់និពន្ធ:** យើងបានសង្កេតឃើញនៅការិយាល័យ"វ៉ត"លេខ១០ នឹង "វ៉ត"លេខ១៤ ថា ព្រឹកនោះអ្នកបោះឆ្នោតខ្មែរ-អាមេរិកាំងមួយចំនួន ទោះជាខិតខំចេញទៅបោះឆ្នោត ក៏ដោយនៅមានការលំបាកក្នុងការអានឈ្មោះបេក្ខជននឹងត្រូវការពន្យល់ពីរបៀបរបបនៃ ការបោះឆ្នោត ។ ព្រឹកនោះពុំមាននរណានៅការិយាល័យបោះឆ្នោតនោះ ជួយពួកគាត់បាន ទេ ។ ហើយនៅការិយាល័យ LTC ក៏ឥតមានអ្នកជួយដូចគ្នាដែរ ។ ការលំបាកនេះ ប្រាកដ ជាពត៌មានសម្រាប់សាលាក្រុងការពារសម្រាប់ថ្ងៃបោះឆ្នោតទី៣វិច្ឆិកាខាងមុខបាន ។

Rita M. **Mercier** 2129 9.34%

James Jim **Leary** 1558 6.84%

Rodney M. **Elliott** 1778 7.80%

William Bill **Samaras** 1533 6.73%

John J. **Leahy** 1678 7.36%

Vesna **Nuon** 1303 5.72%

Daniel P. **Rourke** 1669 7,32%

Corey A. **Belanger** 1273 5.59%

James L. **Milinazzo** 1562 6.85%

Joseph M. **Mendonca** 1203 5.28%

Edward J. **Kennedy, Jr.** 1562 6.85%

David J. **Conway** 1138 4.99%

តទៅទំព័រទី ១១

# CENTURY PHARMACY & OPTICAL

937 Gorham St | ALL MAJOR INSURANCES ACCEPTED | Tel: 978-455-6554

យើងជា
ឱសថ
ស្ថានមួយ
ដែលអាចផ្តល់
ភាពជឿជាក់
ដល់គ្រួសារ
លោកអ្នក



យើងខ្ញុំ
សូមជូនពរ
មហាប្រសើរ
ដល់លោក
អ្នក

- យើងខ្ញុំមានផ្តល់សេវ៉ាបំរើការជូនឱសថដល់ទីលំនៅ ។
- យើងខ្ញុំទទួលកាតម៉ាសហ៊ារ៍, និងកាតធានារ៉ាប់រង សុខភាពផ្សេងៗទៀត
- សេវ៉ាបំរើការល្អ,អតិថិជនមានភាពជឿជាក់ ។
- យកចិត្តទុកដាក់លើបញ្ហាផ្ទល់ខ្លួននៃអតិថិជនរាល់រូប ។
- វេចខ្ចប់ឱសថសមតាមបំណងនៃអតិថិជន ។
- មានផលិតកម្មពិសេសរបស់អូធីស៊ីជារៀងរាល់ខែ ។
- យើងខ្ញុំទទួលការផ្សំថ្នាំតាមបទបញ្ជាជូនដល់អស់លោកអ្នក ។

ជាឱសថស្ថានមួយអាចផ្តល់ភាពជឿជាក់ដល់គ្រួសារអ្នក ។






យើងខ្ញុំនិយាយភាសាខ្មែរ ។

**លេខទូរស័ព្ទ 978-455-6554**

**លេខហ្វាក់ 978-455-9476**

## 937 Gorham St Lowell, MA, 01852

# បទសម្ភាសន៍ជាមួយ លោក អ៊ុំ សំអាន តំណាងរាស្ត្រខ្មែរ

**ដោយ ពិន សំខុន**

**ឡូវែល:** នាឱកាសត្រឡប់មកផ្ទះកាលពីថ្ងៃទីទី២តុលានេះនៅឡូវែលជាកន្លែងដែលលោករស់នៅមុននឹងទៅបំពេញបេសកកម្មជាតំណាងរាស្ត្រខ្មែរ លោក អ៊ុំ សំអាន មានសញ្ជាតិ ខ្មែរ-អាមេរិកាំងបានផ្តល់បទសម្ភាសន៍មួយដល់ខ្មែរផុសស.រ.អា. ស្តីពីរឿងព្រំប្រទល់ដែនខ្មែរដែលមានភាពមិនច្បាស់លាស់មានខ្លឹមសារដូចតទៅ:

**១- បញ្ហារសើប**



**ខ្មែរផុស:** ជុំរាបសួរ! នៅពេលនេះ ឈ្មោះលោក អ៊ុម សំអាន កំពុងល្បីល្បាញ ដោយលោកបានរើកកាយរឿងព្រំប្រទល់ដែន ខ្មែរ-វៀតណាមដែលរឿងនេះបានប៉ះពាល់ដល់អារម្មណ៍រដ្ឋាភិបាលរីឯខាងរដ្ឋាភិបាលក៏កំពុងចាប់ផ្តើមដាក់គំនាបដោយការចាប់ខ្លួនមានទាំងមន្ត្រីមានអភ័យឯកសិទ្ធទៀតផង តើលោកមានការភ័យខ្លាចដែរឬទេ?

**អ៊ុំ សំអាន:** ខ្ញុំបានធ្វើរឿងនេះ១០ឆ្នាំមកហើយ មុននឹងខ្ញុំធ្វើរឿងនេះ ខ្ញុំក៏ដឹងដែរថាតែធ្វើរឿងនេះ បើមិនជាប់គុក-ស្លាប់ ក៏គង់រត់ចោលស្រុក តើទៅខ្លាចអី? ហើយរឿងនេះយើងដឹងហើយ ឱ្យតែប៉ះវៀតណាមលោក ហ៊ុន សែន ច្រឡោតអ៊ីចឹងហើយ តែបើប៉ះជាមួយថៃវិញ ឥតមានអីទេ !

**ខ្មែរផុស:** នៅស្រុកខ្មែរមានបញ្ហាធំៗជាច្រើន ដូចជាអំពើពុករលួយអំពើរំលោភយកដីធ្លីអំពើអយុត្តិធម៌គ្រប់យ៉ាងការបាត់បង់ភែនដីរបស់ប្រទេស.... តាមលោកយល់ តើបញ្ហាណាដែលរសើបជាងគេ?

**អ៊ុំ សំអាន:** រឿងព្រំប្រទល់ដែនជាមួយវៀតណាមនេះឯងជារឿងរសើប ពីព្រោះមន្ត្រីជាន់ខ្ពស់ក្នុងរដ្ឋាភិបាលទាំងអស់សុទ្ធតែបានបុណ្យបានសក្តិដោយសារការគាំទ្ររបស់វៀតណាមតាំងពីឆ្នាំ១៩៨០មក ដូច្នេះពួកគាត់តែងតែមានទំនោរទៅខាងវៀតណាមគាត់បានកាត់ដីទៅឱ្យវៀតណាមតែមិនចង់ឱ្យនរណានិយាយពីរឿងនេះទេ រឿងនេះវារសើបណាស់ ។

**ខ្មែរផុស:** ខ្ញុំតែងតែឮថាខ្មែរស្រឡាញ់ទឹកដីខ្លួនណាស់ ខាងគណបក្សប្រជាជនក៏ខ្ញុំជឿថា ជាអ្នកស្រឡាញ់ទឹកដីខ្លួនដូចគ្នាដែរ តែដែលខ្ញុំមិនយល់នោះថា ហេតុអ្វីក៏ថ្នាក់ដឹកនាំគណបក្សប្រជាជនបែរជាទៅរករឿងអ្នកដែលខិតខំការពារទឹកដីទៅវិញ?

**អ៊ុំ សំអាន:** ខ្ញុំធ្លាប់បានជួបលោក វ៉ា គីមហុង និយាយគ្នាក្រៅផ្លូវការណ៍គាត់ថា ទាល់តែអារសាច់ជូនខ្លាខ្លះទោះបានសុខ? ដូច្នេះទាល់តែកាត់ដីឱ្យយួនខ្លះហើយ ទើបបានសុខ... តវ៉ាចេះតែតវ៉ាហើយ តែបើយួនមិនព្រមគេចង់ធ្វើអីក៏ឱ្យធ្វើទៅ... គាត់បន្តរថា កាលពីជំនាន់ឆ្នាំ៨០នោះ យួនគេធ្លាប់ធ្វើចៅហ្វាយ យើងធ្វើម៉េចនឹងហ៊ានតវ៉ាអីនឹងគេធ្វើសន្ធិសញ្ញាជាមួយនឹងយួនឆ្នាំ៨៥ នឹងបន្តបន្ទាប់យើងដឹងហើយថា បាត់ទឹកដីតែទឹកដីនោះបាត់តាំងតែពីមុនមកតាំងពីជំនាន់ស្តេចតាមកវាបាត់រួចស្រេចទៅហើយ បើឥឡូវយើងទៅទារមកវិញម្តេចនឹងបាន? ទារមិនបានវិញទេ...

**ខ្មែរផុស:** ពាក្យថា បើមិនកាត់ឱ្យគេទេ គេមិនឱ្យសុខទេ តើបានន័យថាដូចម្តេច? គេនឹងធ្វើសង្គ្រាម? គេនឹងធ្វើបាបមេដឹកនាំសព្វថ្ងៃហ្នឹង? ឬក៏មានន័យយ៉ាងម៉េចទៅវិញ?

**អ៊ុំ សំអាន:** មិនដឹងជាបានន័យថា យ៉ាងម៉េចទេ តែខ្ញុំសន្និដ្ឋានបានថា បើមិនកាត់ដីឱ្យទៅគេទេគេនឹងមកធ្វើសង្គ្រាមវាយខ្មែរ ឬក៏ម្យ៉ាងទៀតថាវៀតណាមគេនឹងទម្លាក់ក្រុមអ្នកដឹកនាំខ្មែរនោះចោលចេញ... បើតាមលោក វ៉ា គីមហុង កងទ័ពវៀតណាមគេសម្បើមណាស់ ដូចគ្នានឹងថៃដែរបើប្រៀបធៀបមកខ្មែរនោះតូចណាស់ មិនអាចយកឈ្នះគេបានទេ ...

**ខ្មែរផុស:** ថ្មីៗនេះលោក ហ៊ុន សែន បានអត្ថាធិប្បាយថា ប្រសិនបើគណបក្សសង្គ្រោះជាតិឈ្នះ ថាលោក សម រង្ស៊ី នឹងតវ៉ាយកដីពីវៀតណាមពេលនោះសង្គ្រាមនឹងកើតឡើង ចុះហេតុអ្វីក៏សង្គ្រាមវៀតណាមមិនកើតជាមួយ

**តទៅទំព័រទី ០៥**

# ប្រាក់ឈ្នួលអប្បរមាថ្មីកំណត់ត្រឹម១៤០ដុល្លារ

**ដោយម៉ិច ដារ៉ា | October 8, 2015**

រដ្ឋាភិបាលសម្រេចកំណត់ប្រាក់ឈ្នួលអប្បរមាប្រចាំខែសម្រាប់វិស័យកាត់ដេរដែលមានចំណូលរាប់ពាន់លានដុល្លារនៃប្រទេសកម្ពុជាលើសពីចំនួន១២៨ដុល្លារអាមេរិក គឺច្រើនជាងអ្វីដែលម្ចាស់រោងចក្រចង់បាន ប៉ុន្តែតិចជាងអ្វីដែលទាមទារដោយសហជីពកម្មករមួយចំនួន។

ការប្រកាសពីសេចក្តីសម្រេចនេះ បានធ្វើឡើងបន្ទាប់ពីមានការបោះឆ្នោតរបស់គណៈកម្មាធិការប្រឹក្សាការងារ ដែលស្នើតួលេខ១៣៥ដុល្លារអាមេរិក ហើយដែលបន្ទាប់មកដំឡើងបន្ថែមដោយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន។

លោក អ៊ិត សំហេង រដ្ឋមន្ត្រីក្រសួងការងារបានមានប្រសាសន៍ប្រាប់អ្នកយកព័ត៌មានថា "ថ្ងៃនេះយើងបានសម្រេចយក១៣៥ដុល្លារ។ នេះជាលទ្ធផលដែលអាចទទួលយកបាន ទោះបីជាយើងមិនធ្វើឱ្យគ្រប់ភាគីពេញចិត្តក៏ដោយ...។ លោកនាយករដ្ឋមន្ត្រីបានបន្ថែម៥ដុល្លារ ដូច្នេះវា១៤០ដុល្លារ"។

សមាជិករបស់គណៈកម្មាធិការប្រឹក្សាការងារដែលមានសមាសភាពពីតំណាងរដ្ឋាភិបាល១៤នាក់ និង៧នាក់ៗពីរោងចក្រ និងសហជីពកម្មករបានបោះឆ្នោតមួយសន្លឹកម្នាក់ៗទៅលើសំណើពីភាគីទាំងបី គឺ១៣៣ដុល្លារពីរោងចក្រ១៣៥ដុល្លារពីរដ្ឋាភិបាល និង១៦០ដុល្លារពីសហជីពកម្មករ។




សំឡេងឆ្នោតទាំងអស់លើកលែងតែបួនសំឡេង បានបោះឆ្នោតគាំទ្រយក១៣៥ដុល្លារអាមេរិក។ សំណើរបស់សហជីពបានទទួលពីរសំឡេង ហើយតួលេខរបស់រោងចក្រមិនមាន

តទៅទំព័រទី១១

# New Garment Sector Minimum Wage Set at $140

**byMech Dara | October 8, 2015**

The government set the new monthly minimum wage for the country's billion-dollar garment sector at $140 on Thursday-up from $128-more than what factory owners wanted but far less than the raise demanded by some unions.

The announcement of the decision followed a morning vote of the Labor Advisory Committee (LAC), which proposed a figure of $135 that was then bumped up by Prime Minister Hun Sen.

"Today we decided on $135," Labor Minister Ith Sam Heng told reporters. "This is an acceptable result, although we have not satisfied all the parties…. The prime minister added $5, so it's $140."

Members of the LAC-made of up 14 government representatives and seven each from the factories and unions-cast one vote each on proposals from the three sides: $133 from the factories, $135 from the government, and $160 from the unions.

All but four of the votes were cast for $135. The unions' proposal garnered two votes and the factories suggestion attracted none. Two representatives abstained.

The new figure will take effect on January 1, and was decided after months of negotiations failed to achieve a hoped-for consensus.

The factories eased off their initial position that they could not afford any raise whatsoever next year, while the most strident unions gradually whittled down their starting demand for $207. Before Thursday's vote, they had failed to narrow the gap between $133 and $160.

dara@cambodiadaily.com

## តមកពីទំព័រទី ០៣ បទសម្ភាសន៍ជាមួយលោក អ៊ុំ សំអាន...

ហ៊ុន សែន បែរជាទៅកើតតែជាមួយ សម រង្ស៊ី?

**អ៊ុំ សំអានៈ** អាហ្នឹងមិនមែនជារឿងព្រំប្រទល់ដែនទេ តែជារឿងឃោសនាបោះឆ្នោត ពីព្រោះលោក ហ៊ុន សែន ចង់ប្រាប់រាស្ត្រថាកុំឱ្យបោះឆ្នោតឱ្យលោក សម រង្ស៊ី ពីព្រោះវាជាឆ្នោតមានសង្គ្រាមជាមួយវៀតណាម...រឿងសង្គ្រាមនេះពាក្យលោក វ៉ា គឹមហុង ក៏មិនពិតពាក្យរបស់លោក ហ៊ុន សែន ក៏មិនពិតដែរ ពីព្រោះគណបក្សសង្គ្រោះជាតិនៅពេលឈ្នះឆ្នោតនឹងប្រើតុលាការអន្តរជាតិប្រើច្បាប់ជាមធ្យោបាយដោះស្រាយទំនាស់ បើជជែកគ្នាមិនបាន ដូច្នេះធ្វើម្តេចនឹងមានសង្គ្រាមទៅកើត?

**ខ្មែរប៉ុស្ត៍ៈ** បើរឿងព្រំប្រទល់ដែនខ្មែរ ជារឿងរសើប ដូច្នេះបានន័យថា គណបក្សប្រជាជនអាចនឹងចាញ់ឆ្នោតនៅឆ្នាំខាងមុខដោយសាររឿងនេះ មែនទេ?

**អ៊ុំ សំអានៈ** បាទ! តែគណបក្សប្រជាជនដោះស្រាយបញ្ហាព្រំប្រទល់ដែននេះមិនរួចទុកសន្ធិសញ្ញាទាំងឡាយជាមួយវៀតណាមនៅដដែលប្រជាជននឹងនៅតែបាត់ដីស្រែចំការខ្លួន ពេលនោះប្រជាពលរដ្ឋមិនបោះឆ្នោតឱ្យទេ ។ ផ្ទុយទៅវិញ ដើម្បីឱ្យប្រជាពលរដ្ឋទទួលបាននូវដីកេររបស់គាត់វិញ វាទាល់តែលប់សន្ធិសញ្ញាព្រំដែនទាំងអស់ជាមួយវៀតណាមឱ្យស្របតាមស្មារតីនៃសន្ធិសញ្ញាក្រុងប៉ារីស១៩៩១ ហើយបោះបង្គោលសីមា ដូចកាលជំនាន់បារាំង មាន ១២៤ឡាក់បង្គោលរាយតាមបណ្តោយព្រំប្រទល់ដែង...ធ្វើរបៀបនេះបានទើប ។

(នៅមានត)

## ទីស្តីការគណៈរដ្ឋមន្ត្រីៈ ករណី អ៊ុំ សំអាន រាជរដ្ឋាភិបាលពិចារណាចាត់វិធានការតាមផ្លូវច្បាប់ ដើម្បីការពាររដ្ឋធម្មនុញ្ញ

(ភ្នំពេញ)ៈ អ្នកនាំពាក្យអង្គភាពព័ត៌មាន និងប្រតិកម្មរហ័សនៃទីស្តីការគណៈរដ្ឋមន្ត្រីបាន សេចក្តីបំភ្លឺមួយនៅរសៀលថ្ងៃទី០៨ ខែតុលា ឆ្នាំ២០១៥នេះ ដោយបានបង្ហាញនូវការសោកស្តាយយ៉ាងខ្លាំង ចំពោះករណីលោក អ៊ុំ សំអាន ដែលបាននឹងកំពុងបន្តចិញ្ចឹមនូវឧបាយកលទុច្ចរិត បំពុលបរិយាកាសអំពីបញ្ហាអធិបតេយ្យជាតិ និងបូរណភាពទឹកដី ក្រោយពីរាជរដ្ឋាភិបាលបានបញ្ចប់នូវការផ្ទៀងផ្ទាត់ផែនទីផ្លូវការ និងស្របច្បាប់របស់ខ្លួន។

នៅក្នុងសេចក្តីបំភ្លឺរបស់ទីស្តីការគណៈរដ្ឋមន្ត្រីបានបញ្ជាក់ថា "រាល់ទង្វើ និងព័ត៌មានដែលបានផ្សព្វផ្សាយដោយឯកឧត្តម អ៊ុំ សំអាន ទាំងក្នុងពេលកន្លងមក ក៏ដូចជាក្នុងពេលបច្ចុប្បន្ននេះ គឺបង្កប់ដោយឧបាយកលទុច្ចរិតក្នុងការបំផុសគំនិតជាតិនិយមជ្រុលបំបែកបំបាក់ការឯកភាពជាតិ បង្កឱ្យមានការភ័ន្តច្រឡំក្នុងសាធារណមតិជាតិ និងអន្តរជាតិអំពីបញ្ហាអធិបតេយ្យជាតិ និងបូរណភាពទឹកដីកម្ពុជា"។

ក្រៅពីនោះទីស្តីការគណៈរដ្ឋមន្ត្រីបានធ្វើការព្រមានថា រាជរដ្ឋាភិបាលមានកាតព្វកិច្ចពិចារណានូវវិធានការតាមផ្លូវច្បាប់ ចំពោះករណីលោក អ៊ុំ សំអាន ដើម្បីការពាររដ្ឋធម្មនុញ្ញ ក៏ដូចជាសេចក្តីសុខសាន្តរបស់ប្រជាជាតិ និងប្រជាជនកម្ពុជាទាំងមូល។

សូមជំរាបថា តំណាងរាស្ត្រគណបក្សសង្គ្រោះជាតិ លោក អ៊ុំ សំអាន បានប្រកាសតាមវិទ្យុអាស៊ីសេរីនៅយប់ថ្ងៃទី០៧ ខែតុលាថា លោកទើបបានរកឃើញផែនទីមួយទៀត ដែលជាផែនទីបោន (Bonne) ខ្នាត ១.១០០.០០០ (មួយលើមួយរយពាន់) ដូចមានចែងក្នុងរដ្ឋធម្មនុញ្ញកម្ពុជាពីបណ្ណាល័យអង្គការសហប្រជាជាតិ។

ខាងក្រោមនេះជាសេចក្តីបំភ្លឺរបស់ទីស្តីការគណៈរដ្ឋមន្ត្រីជុំវិញការបំពុលបរិយាកាសរបស់លោក អ៊ុំ សំអានៈ

ព្រះរាជាណាចក្រកម្ពុជា
ជាតិ សាសនា ព្រះមហាក្សត្រ

ទីស្តីការគណៈរដ្ឋមន្ត្រី

**សេចក្តីបំភ្លឺ**

វិចារណកថា

# ករណីដែលគណបក្សសង្គ្រោះជាតិអាចចាញ់ឆ្នោតនៅឆ្នាំ២០១៨

ដោយ ពិន សំខុន

ពិន សំខុន

បងប្អូនខ្មែរជាច្រើន តែងតែជួបខ្ញុំ ហើយចង់ដឹងពីមតិខ្ញុំថាតើប្រទេសយើងយ៉ាងម៉េចទៅហើយជួយរួចទេមើលទៅ? នេះដោយសារគេដឹង ថាខ្ញុំមានយោបល់ជាមនុស្សឯករាជ្យដោយសារតែខ្ញុំតាមដាននឹងស្គាល់នយោបាយខ្មែរបានច្បាស់ថែមទាំងស្គាល់គ្រប់ភាគីអ្នកធ្វើនយោបាយនោះដោយផ្ទាល់ទៀតផងនោះ ខ្ញុំអាចនិយាយបានថា "នៅមានសញ្ញាជាច្រើនដែលបង្ហាញថាគណបក្សសង្គ្រោះជាតិនៅមានកម្លាំងគាំទ្រពីមហាជនក្នុងស្រុកយ៉ាងរឹងមាំនៅឡើយ ដោយសារ១-ចលនាផ្ទៃក្នុងនៃគណបក្សសង្គ្រោះជាតិនៅរក្សាភាពសាមគ្គីគ្នាជាធ្លុងមួយបាននៅឡើយ ២-សកម្មភាពគាំទ្រ ចំពោះផលប្រយោជន៍ប្រជាពលករចំពោះកិច្ចការពារផលប្រយោជន៍ជាតិរបស់សមាជិកគណបក្សសង្គ្រោះជាតិក៏នៅតែតស៊ូរក្សាបានខ្ពស់ជាដរាបបាន ៣-ប្រជាពលករខ្លួនឯងគាំទ្រដោយក្រុមយុវជននៅតែបង្ហាញកិច្ចការពារផលប្រយោជន៍ខ្លួនឯងនឹងផលប្រយោជន៍ជាតិដោយគ្មានខ្លាចរអាអំណាចរដ្ឋ ៤-គណបក្សប្រជាជនកំពុងកាន់អំណាចនៅតែអនុវត្តន៍នយោបាយគ្រួសារនិយមនយោបាយពុករលួយលើសម្បត្តិជាតិនឹងនយោបាយគាបសង្កត់ដោយហឹង្សា ៥-គណបក្សប្រជាជនខ្លួនឯង ក៏ប្រឈមមុខនឹងការបែកបាក់ជាមួយចរន្តថ្មីរបស់ខ្លួនដែលចង់បានសុខជាមួយប្រជាជាតិឱ្យបានវែងឆ្ងាយទៅមុខ ៦-ចលនានៃព័ត៌មានសេរីនៅតែផ្តល់ដំណឹងពិតទៅមហាជនបាននៅឡើយ ៧-នយោបាយខ្មែរនៅតែការពារវៀតណាមឱ្យឈ្លានពានខ្មែរ"។

សញ្ញាទាំងនេះនឹងបញ្ចេញលទ្ធផលនៅពេលបោះឆ្នោតក្នុងប្រទេសដែលកាលពីពេលបោះឆ្នោតមុន១ម៉ាស៊ីនបោះឆ្នោតនោះ គឺ"គ.ជ.ប." បានត្រូវរងគ្រោះដោយការគណបក្សប្រជាជនជាអ្នកកាន់កាប់បញ្ចូលលទ្ធផលមកមិនអាចឱ្យគេឯងជឿបាន។ តែចុងក្រោយនេះគណបក្សសង្គ្រោះជាតិបានចូលទៅជួយជួសជុលម៉ាស៊ីនបោះឆ្នោតនោះ ហើយផ្តល់មតិថា មានសង្ឃឹមថា អាចប្រើប្រាស់ គួរឱ្យជឿបានច្រើនហើយ។ ម៉ាស៊ីនថ្មីនោះនឹងយកមកប្រើជាផ្លូវការលើកដំបូងនៅឆ្នាំ២០១៧ខាងមុខ នាឱកាសបោះឆ្នោតឃុំ-សង្កាត់។ ម៉ាស៊ីន"គ.ជ.ប."ថ្មីនោះ ក៏នឹងសាកល្បងនូវប្រាជ្ញាលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ដែលកំពុងប្រើនយោបាយ"ឈ្នះ១"សម្រាប់ខ្លួនគាត់ ថាតើប្រជារាស្ត្រនឹងផ្តើមប្តូរពូកមេឃុំនឹងចៅសង្កាត់ពីអំណាចគាត់បានក៏រីតណា? ពេលនោះទើបសាធារណជនបានដឹងថា ម៉ាស៊ីនបោះឆ្នោតថ្មីនោះ ប្រើគួរឱ្យជឿបានហើយឬនៅ? បើគួរឱ្យជឿបានហើយ ពេលនោះលោក ហ៊ុន សែន ក៏គួរតែដឹងថា ជាពេលល្អសម្រាប់គិតដកខ្លួនចេញឱ្យហើយទៅ បើចង់សង្គ្រោះកេរឈ្មោះនឹងរក្សាស្នាដៃខ្លះ១បាននោះ តែបើរង់ចាំដល់បោះឆ្នោតឆ្នាំ២០១៥ចប់ទៅវិញនោះ ហើយលទ្ធផលមិនបានដូចដែលលោករង់ចាំទេនោះ ពេលនោះខ្ញុំជឿថា មិនមែនតែលោក ហ៊ុន សែន ម្នាក់ឯងទេដែលរបូត គឺរបូតទាំងបួសរយាងជាមួយគ្នាតែម្តង ទោះជាលោកទទួលឬមិនទទួលស្គាល់លទ្ធផលក៏ដោយ។

ដោយពីពេលនេះទៅគណបក្សប្រជាជននៅមានពេល២ឆ្នាំសម្រាប់កែរប្រែស្ថានភាពសម្លេងប្រជារាស្ត្រហេតុនេះហើយបានជាគេឃើញអ្វីក៏ដោយឱ្យតែប្រឆាំងនឹងសង្គ្រោះជាតិសុទ្ធតែស្របច្បាប់ ហ៊ុន សែន ទាំងអស់... រីឯអ្វីដែលគាំទ្រសង្គ្រោះជាតិសុទ្ធតែមានទោសជាប់គុកមិនថាអ្នកឯងមានអភ័យឯកសិទ្ធ ឬក៏អត់នោះទេ។ ធ្វើនេះដើម្បីបង្កើនចំនួនអ្នកប្រឆាំងក្នុងន័យថាបំបែកសន្លឹកឆ្នោតចេញពីកម្លាំងសង្គ្រោះជាតិ។ មិនទាន់ដល់ឆ្នាំ២០១៨ផង គេផ្តើមឃើញគណបក្ស"សម្លេងប្រជាពលរដ្ឋ"របស់ សួន សេរីរដ្ឋា - គណបក្ស"សម្បកឃ្មុំ"របស់ ម៉ម សូណង់ដូ- គណបក្ស"ហ្វ៊ុនស៊ិនប៊ិច"របស់ទ្រង់ រណឫទ្ធិ។ល។ ទាំងអស់គ្នានេះ សុទ្ធតែប្រឆាំងនឹងរបប ហ៊ុន សែន ដែលនឹងទៅចែកឆ្នោតបំបែកពីគណបក្សសង្គ្រោះជាតិ។

រីឯអ្នកគាំទ្រគណបក្សសង្គ្រោះជាតិនៅសហរដ្ឋអាមេរិកវិញ កំពុងតែបែកបាក់គ្នាយ៉ាងរយីករយាក គួរឱ្យខ្មាស់គេណាស់មិនសមតាំងខ្លួនជាសមាជិកគណបក្សសង្គ្រោះជាតិអីទេ ពីព្រោះលោកសមរង្សីឱ្យឋាន។ ត្រឹមអ្នកគាំទ្រតែប៉ុណ្ណោះធ្វើតាំងពី"ធំ"រហូតមក"តូច" បើនៅតែបែកគ្នាមិនអាចគាំទ្រនរណាបានទេ។

យើងមើលឃើញករណីយដែលគណបក្សសង្គ្រោះជាតិអាចបាត់បង់សន្លឹកឆ្នោតនៅត្រង់ ១-គណបក្សមិនជឿលើការធ្វើត្រូវរបស់ថ្នាក់ដឹកនាំខ្លួនឯង ២-ថ្នាក់ដឹកនាំមិនហ៊ានធ្វើអ្វីដែលខ្លួនយល់ថាត្រូវធ្វើ ៣-ធ្លាក់ក្នុងអន្លង់ដែលកុម្មុយនីស្តកាយដាក់អន្ទាក់ ៤-ព្យាយាមដើរផ្លូវប្រយោជន៍ជាតិណែនាំនឹងជួយអ្នកដទៃឱ្យដើរផ្លូវខ្លួនឱ្យធំជាងការព្យាយាមរកចំណេញជាងប្រយោជន៍ជាតិ ៥-មិនបាត់បង់ក្តីសង្ឃឹមមិនដើរវៀងផ្លូវសុច្ចរិតមិនសណ្តោសដល់ទុច្ចរិតមិនបោះបង់មិត្តភាព ។

គឺប្រាកដជាមិនមែនទ្រព្យសម្បត្តិទេ ដែលកំណត់អនាគតអ្នកឈ្នះឆ្នោត -គឺប្រាកដជាមិនមែនអ្នកកាចទេ ដែលជាអ្នកឈ្នះឆ្នោត- គឺប្រាកដជាសម្បូរអ្នកក្លាហានទៅបោះឆ្នោតដែលកំណត់សន្លឹកឆ្នោតឈ្នះដោយសន្តិភាព... មកទល់នឹងថ្ងៃនេះ គណបក្សសង្គ្រោះជាតិនៅតែជាកម្លាំងផ្លាស់ប្តូរតែមួយគត់របស់ប្រជាជាតិខ្មែរតែដដែលនៅឡើយ ៕



# REMEDIUM PHARMACY

2 VINAL Square
N. Chelmsford, MA 01863

Phone: (978) 251-7070



## FREE Daily Home Delivery

**Blisterpack Packaging**

**Friendly Consultations**

**Compounded Medications**

**Easy Transfers**

បុគ្គលិកទាំងអស់របស់ឱសថស្ថានរ៉ឺមីឌីមយើងខ្ញុំមានបទពិសោធន៍គ្រប់គ្រាន់ក្នុងការបំរើសេវាផ្តល់ឱសថជូនដល់សហគមន៍ខ្មែរ។ គេទាំងអស់គ្នាបានត្រៀមរួចជាស្រេចដើម្បីជួយ និង ត្រៀមបំរុងជានិច្ច ដើម្បីប្រើគ្រប់ជំនាញ និង ការពិសោធន៍ក្នុងការបំរើលោកអ្នក។




ឱសថស្ថានរ៉ឺមីឌីម ផ្តល់ជូនលោកអ្នកនូវ:

**ជូនឱសថឲ្យដល់លំនៅស្ថានដោយឥតគិតថ្លៃ**
**ដាក់ឱសថក្នុងបន្ទះបែងចែកឱសថសំរាប់ប្រើតាមពេល**
**ការពិគ្រោះយោបល់យ៉ាងរាក់ទាក់ស្និទស្នាល**
**មានផ្តល់ជូនម្សៅថ្នាំលាយ**
**ភាពងាយស្រួលក្នុងការផ្ទេរចេញចូល**



**Cristina គ្រីស្ទីណា:**
គ្រីស្ទីណាមានការពិសោធន៍គ្រប់គ្រាន់នៅក្នុងកិច្ចការបំរើសហគមន៍ខ្មែរក្រុងឡូវែលអស់រយៈពេលជាង៣ឆ្នាំមកហើយ។អ្នកស្រីគឺជាឱសថការិនីដែលគ្រប់គ្រងឱសថស្ថាន រ៉ឺមីឌីម នេះ ហើយគាត់ក៏អាចធ្វើការពិគ្រោះអំពីឱសថ ជូនលោកអ្នកដល់ផ្ទះផងដែរ។ ដោយសារការផ្តល់នូវសេវាកម្មផ្នែកឱសថនេះ បានច្បាស់លាស់ទើប អ្នកស្រីអាចបង្កើត បាននូវចំណងមិត្តភាពយ៉ាងល្អប្រពៃក្នុងសហគមន៍ខ្មែរក្នុងក្រុងឡូវែល ហើយអ្នកស្រីមានសេចក្តីរីករាយណាស់ដើម្បីរង់ចាំបំពេញនូវបំណងរបស់លោកអ្នកដែលត្រូវការឱសថ។



**Pahim លោកប៉ាហ៊ីម:**
គឺជាបុគ្គលម្នាក់ដែលមានការគោរពច្រើននៅក្នុងសហគមន៍ខ្មែរ គាត់ក៏ជាសមាជិកម្នាក់នៅក្នុងគណកម្មការវត្តត្រៃរតនារាម ហើយធ្លាប់មានការពិសោធន៍ជាច្រើនឆ្នាំក្នុងការជួយសហគមន៍ដែលត្រូវការព្យាបាលជម្ងឺ។ ក្នុងរយៈកាលកន្លងមក គាត់ធ្លាប់បានធ្វើការយ៉ាងច្រើនជួយគាំទ្រដល់អ្នកជម្ងឺនៅមជ្ឈមណ្ឌលសុខភាពសហគមន៍ក្រុងឡូវែលនិងមណ្ឌលសុខភាពពេទ្យមេត្តា ព្រមទាំងធ្លាប់បានចូលរួមចំណែកក្នុងការថែទាំដោយឱសថសំរាប់សហគមន៍ខ្មែរក្រុងឡូវែលអស់រយៈពេលជាង២ឆ្នាំផងដែរ។ ក្នុងនាមជសមាជិកម្នាក់នៃឱសថស្ថានរ៉ឺមីឌីម គាត់នឹងបន្តធ្វើការបំរើឱ្យកាន់តែខ្លាំងខ្លាថែមទៀតដើម្បីបំពេញនូវតំរូវការក្នុងការផ្តល់ឱសថដល់លោកអ្នក។



**Dary ដារី:**
តែងបានយកចិត្តទុកដាក់ជាប់ជានិច្ចក្នុងសេវាកម្មផ្តល់ឱសថ ដើម្បីបំពេញតាមតំរូវការនៃសហគមន៍ខ្មែរក្រុងឡូវែលអស់រយៈជាង២ឆ្នាំមកហើយ ហើយតែងទទួលបាននូវការកោតសរសើរពីសំណាក់អតិថិជនដែលបានជួបប្រាស្រ័យជាមួយគាត់។ ក្នុងឋានៈជាអ្នកបច្ចេកទេសម្នាក់របស់ឱសថស្ថាន គាត់មានការយល់ដឹងយ៉ាងជ្រៅជ្រះអំពី តំរូវការ និងប៉ិនប្រសប់ក្នុងការផ្តល់សេវាជូនលោកអ្នកនិងចេះសំដែងនូវការគោរពយ៉ាងទន់ភ្លន់ចំពោះលោកអ្នកផងដែរ។



**Kelly ខែលលី:**
គឺជាឱសថការិនីយើងដែលអាចនិយាយភាសាខ្មែរហើយដែលយកចិត្តទុកដាក់ចេះជួយលោកអ្នក។ គាត់ជាឱសថការិនី ចេញពីមហាវិទ្យាល័យឱសថសាស្ត្ររដ្ឋម៉ាសាឈូសេត និង ពេញចិត្តធ្វើការបំរើសហគមន៍ខ្មែរដែលគាត់ក៏ជាសមាជិកម្នាក់នៃសហគមន៍នេះដែរ។



**Daniela ដានីញែលឡា:**
មានជំនាញច្បាស់លាស់ក្នុងការវេចខ្ចប់ឱសថដាក់ក្នុងបន្ទះពង្រាយថ្នាំសំរាប់ប្រើតាមពេល ហើយធ្លាប់ឆ្លងកាត់ការថែទាំអ្នកជម្ងឺខ្មែរដែលរស់នៅក្នុងក្រុងឡូវែលនេះអស់រយៈពេលជាង៣ឆ្នាំមកហើយ។ ប្រសិនបើលោកពេញចិត្តនឹងការប្រើថ្នាំដាក់ក្នុងបន្ទះបែបនេះ ដានីញែលឡា ពេញចិត្តណាស់នឹងធ្វើកិច្ចការនេះជូនលោកអ្នក។



**Kassandra កាសាន់ដ្រា:**
គឺជាបុគ្គលិកដែលមានការពិសោធន៍ច្រើនក្នុងការធ្វើទំនាក់ទំនងជាមួយសហគមន៍ខ្មែរ និងស្បានិសសដែលរស់កក្នុងងក្រុងឡឡូវែលលនេះ។
លោកអ្នកអាចនឹងពេញចិត្តអំពីភាពរាក់ទាក់រាល់ពេលនិយាយឆ្លើយឆ្លងតាមទូរស័ព្ទជាមួយនាង និងប៉ិនប្រសប់ក្នុងការរៀបចំឱសថជូនលោកអ្នកនៅរាល់ពេលដែលលោកអ្នកត្រូវការ។

# បាតុកម្មប្រឆាំងលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន នៅបូរីញូយ៉ក

**ដោយ ឆលី យ៉ុង**

បាតុករខ្មែរប្រមាណ៧-៨០០នាក់ បានបង្ហាញវត្តមាននៅមុខបូរីអង្គការសហប្រជាជាតិញូយ៉ក ដើម្បីបញ្ចេញឆន្ទៈពិការមិនពេញចិត្តចំពោះនយោបាយកម្ពុជាដឹកនាំដោយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន កាលពីថ្ងៃទី ២៦កញ្ញា ឆ្នាំ២០១៥ នាឱកាសដែលលោកនាយករដ្ឋមន្ត្រីរូបនេះ មកធ្វើសេចក្តីថ្លែងការណ៍នៅទីក្រុងញូយ៉កនាវេទិការអង្គការសហប្រជាជាតិ ។

បាតុករជំច្រើនសន្ធឹកខ្លះធ្វើដំណើរតាមរថយន្តផ្ទាល់ខ្លួន ខ្លះមកតាមរថយន្តបើស ខ្លះមកតាមយន្តហោះដែលគណកម្មការរៀបចំបាតុកម្ម



លោក ទូច វិបុល និយាយថា បាតុករខ្មែរមកពីរដ្ឋកាលីហ្វ័រញ៉ា ពីរដ្ឋអូហាយ៉ូ រដ្ឋមីនិសូតា រដ្ឋម៉ាសាឈូសិត រដ្ឋកូណិកទីកិត រដ្ឋញូជ័រស៊ី រដ្ឋវៀស៊ីនៀរដ្ឋម៉ារីឡែនពីរដ្ឋខាងត្បូងនៃសរអាមានរដ្ឋណតការ៉ូឡាយណា រដ្ឋជ័រចា រដ្ឋហ្វ្លរីដា រដ្ឋជិតជាងគេគឺញូយ៉ក ជាពិសេសព្រះសង្ឃព្រះនាម លួន សាវ៉ាត មកពីកម្ពុជា។

ជាទូទៅក្រុមបាតុករទាមទារ "ឱ្យលោក ហ៊ុន សែន ចុះចេញពីដំណែង" ខ្លះថា "លោក ហ៊ុន សែន ជាជនក្បត់ជាតិបានធ្វើទារុណកម្មលើពលរដ្ឋខ្លួនឯង" ខ្លះមិនសប្បាយចិត្តនឹងនយោបាយសម្បទានដី៩៩ឆ្នាំ **តទៅទំព័រទី ១០**



## តមកពីទំព័រទី ០៨ បាតុកម្មប្រឆាំងលោកនាយករដ្ឋមន្ត្រី...

ឱ្យទៅប្រទេសជិតខាងជាពិសេសឱ្យទៅប្រទេសវៀតណាមបដារជាច្រើនសរសេរថា "ហ៊ុន សែន អើយ ចុះចេញទៅ" តែគេពុំឃើញវត្តមានលោក ហ៊ុន សែន មកជួបបាតុករខ្មែរដែលមកសម្តែងឆន្ទៈពីគ្រប់តំបន់នោះទេ។ ផ្ទុយទៅវិញ លោក ហ៊ុន សែន បានរីករាយនឹងទៅជួបសមាជិកគណបក្សប្រជាជនកម្ពុជាប្រមាណ ២០០នាក់ រស់នៅសហរដ្ឋអាមេរិកនេះ ដែលបានទៅសម្តែងការគួរសមដល់រូបលោកនៅក្នុងសណ្ឋាគារដែលលោកស្នាក់អាស្រ័យនៅញូយ៉កនេះ។

លោក កៅ គីមហួន រដ្ឋមន្ត្រីប្រតិភូអមនាយករដ្ឋមន្ត្រីបានធ្វើសេចក្តីរាយការណ៍ "ភូតភរ ឬក៏ ចង់ធ្វើឱ្យនាយករដ្ឋមន្ត្រីខ្មែរពេញចិត្ត" ថា "បាតុករខ្មែរមានតែ២-៣នាក់ នាក្រៅបរិវេណបូរីញូយ៉កប៉ុណ្ណោះ" បានធ្វើឱ្យគណកម្មការលោក ទូច វិបុល ចំអកឱ្យថា "ទង្វើនេះពុំមែនជាគំរូសម្រាប់សង្គមខ្មែរឡើយ លោកគួរតែទទួលស្គាល់ការពិត ហើយសុំទោសចំពោះបងប្អូនបាតុករទាំងអស់"៕

**អត្ថបទនិងរូបថត ឆលី យុង**



តមកពីទំព័រទី ១

## លទ្ធផលនៃការបោះឆ្នោតសមាជិក...


Paul Ratha Yem
1125
4.94%


Martin J. Hogan
424
1.86%


Jordan John Gys
812
3.56%


Robert W. Merrill, Jr.
291
1.28%


Pan So
706
3.10%


Mayon G. Mitchell
283
1.24%


Cheth Khim
697
3.06%

បេក្ខជន Mayon G. Mitchell បានត្រូវជម្រុះ

ចេញ។ រីឯអ្នកនៅសល់ទាំង១៨ រូបនឹងត្រូវបន្តប្រកួតប្រជែងនៅជុំផ្តាច់ព្រ័តដែលនឹងប្រព្រឹត្តទៅនៅថ្ងៃទី៣ ខែវិច្ឆិការឆ្នាំ២០១៥ខាងមុខ។ សូមរំលឹកម្តងទៀតថា អ្នកបោះឆ្នោតនៅថ្ងៃទី៣នោះ មានសិទ្ធគូសយកឈ្មោះ៩រូប ក្នុងប័ណ្ណបោះឆ្នោតរបស់ខ្លួន ដូចជានៅជុំទី១ដែរ។

នៅមានពលរដ្ឋជាច្រើនឆ្ងល់ថា អភិបាលក្រុងមានតែ១ ហេតុអ្វីក៏ចាំបោះឆ្នោតដល់ទៅ៩រូប ? ច្បាប់នៅទីក្រុងឡូវែលនេះ គេចែងថា ការគ្រប់គ្រងក្រុងឡូវែលជាភារៈកិច្ចរបស់ក្រុមប្រឹក្សាមួយដែលមានគ្នា៩រូប ហើយអ្នកទាំង៩រូបនោះត្រូវជ្រើសរើសបុគ្គលម្នាក់ឱ្យធ្វើជាតំណាងបន្ទាប់ពីបោះឆ្នោតបានក្រុមប្រឹក្សាក្រុង៩រូបរួចមក គឺអភិបាលក្រុងដែលជាអ្នកនាំពាក្យនៃសេចក្តីសម្រេចទាំងឡាយរបស់ក្រុមប្រឹក្សាទៅឱ្យសាលាក្រុងអនុវត្តន៍នឹងទៅឱ្យជាដំណឹងដល់សាធារណជន ផង។

ក្នុងតួរលេខដែលបង្ហាញខាងលើយើងឃើញថា អ្នកមានសិទ្ធបោះឆ្នោតតែ៦.៦៩ភាគរយប៉ុណ្ណោះបានចេញទៅបោះឆ្នោតបឋម ។ ជាទូទៅនៅថ្ងៃផ្តាច់ព្រ័តគេតែងសង្កេតឃើញថា នឹងមានប្រជាពលរដ្ឋ ២០ ទៅ ២៥ ភាគរយ ជួនកាលដល់ទៅ៤០ភាគរយផងក៏មានអាចចេញទៅបោះឆ្នោតឱ្យបេក្ខជនរបស់ខ្លួននៅជុំទី២ ដូច្នេះអាចនឹងប្តូរលំដាប់លេខរៀងខុសពិការបាន់ស្មានបានយ៉ាងងាយ ។ ការពិភក្សាដេញដោលរវាងបេក្ខជនទាំង១៨នាក់ នឹងក្រុមអ្នកកាសែតតាមទូរទស្សន៍ LTC កាលពីថ្ងៃទី១តុលា បានផ្តល់ទស្សនៈមួយចំនួនដល់ចំណូលចិត្តនៃអ្នកបោះឆ្នោតដែលមិនទាន់មានជម្រើសខ្លះហើយ ហើយនៅសល់ការឃោសនាយ៉ាងប្រឹងប្រែងរបស់បេក្ខជនម្នាក់ៗដោយខ្លួនឯងថែមទៀត ដែលនឹងធ្វើឱ្យមនុស្សចេញទៅបោះឆ្នោតរឹតតែច្រើន វានឹងធ្វើឱ្យផ្លាស់ប្តូរចរន្តនៃលទ្ធផល គួរឱ្យភ្ញាក់ផ្អើលបាន។

ផ្អែកណាស់នៅឆ្នាំនេះ ដែលនៅក្នុងសហគមន៍ខ្មែរមានថ្នាក់ដឹកនាំគ្រប់និន្នាការនាំគ្នាមកចែចង់យ៉ាងញឹកញាប់អ្នកបោះឆ្នោតខ្លះក៏បាក់ចិត្តទៅលើបេក្ខជនខ្លះនោះ រួចទៅហើយ តែក៏នៅសល់ចន្លោះយ៉ាងធំសម្រាប់ទុកឱ្យបេក្ខជនខ្លះឯទៀតមកដាក់ស្នេហ៍បានដែរ ។ នេះហើយជាបំណងប្រាថ្នានៃសហគមន៍ខ្មែរយើងដែលជាជនភៀសខ្លួនចង់ស្វែងរកការរីកចំរើនតាមរបបប្រជាធិបតេយ្យឱកាសអ្នកងើកឈរកំពុងតែមកដល់ហើយ ៕

តមកពីទំព័រទី ៤

## ប្រាក់ឈ្នួលអប្បបរមាថ្មីកំណត់ត្រឹម...

សំឡេងគាំទ្រទេ។ តំណាងពីរនាក់បានបោះឆ្នោតអនុបវាទ។

តួលេខថ្មីនឹងចូលជាធរមាននៅថ្ងៃទី១ខែមករា ហើយបានសម្រេចយក បន្ទាប់ពីមានការចរចាជាច្រើនខែខកខានមិនទទួលបានឯកភាពគ្នា។

រោងចក្របានបន្ថយគោលជំហរដំបូងរបស់ខ្លួន ដែលថាពួកគេមិនអាចដំឡើងប្រាក់ឈ្នួលបានទេសម្រាប់ឆ្នាំក្រោយ ចំណែកឯសហជីពដែលតវ៉ាយ៉ាងខ្លាំង ក៏បានបន្ថយការទាមទារចំនួន២០៧ដុល្លាររបស់ខ្លួនដែរ។ មុននឹងមានការបោះឆ្នោតថ្ងៃនេះ ពួកគេខកខានមិនបានឯកភាពរវាងតួលេខ១៣៣ដុល្លារ និង១៦០ដុល្លារទេ៕




KhmerPost USA is the only Cambodian newspaper that has the highest circulation and is most read in the Cambodian communities in the East Coast of United States. The newspaper prints 32 pages an issue - all in color, premium 35 pound stocks paper. It provides important news and information to a market that is often isolated from the larger community due to a language barrier. This includes not only national and international news but practical local information concerning health, education, politics, businesses and community involvement. Found in 2007 by a respectable Cambodian Journalist, Roger Samkhon Pin, the former President of Cambodian Journalist Association of Cambodia (1994-1997), the Director of Radio Free Asia, Cambodian Services in Washington D.C (1998-2003), and the founder and broadcaster of Cambodian-American news through five Radio Stations around the U.S (2004-2008).

## Publication Frequency

24 times a year.

## General Information

**Distributions:**

- 70+ locations in Lowell, MA (5,000 copies per issues)

**2015 Remaining Prints**

- October 9th & 23rd
- November 6th & 20th
- December 4th & 18th

* all ad materials are due one due one week prior to the publishing date.

## Advertising Rates

| Ads Size | 1 issue | 3 months 5% off | 6 months 7.5% off | 12 months 10% off |
|---|---|---|---|---|
| Full Page Color | 460 | 874/month | 851/month | 828/month |
| ½ page (color) | 310 | 589/month | 573.50/month | 558/month |
| ¼ page (color | 165 | 313.50/month | 305.25/month | 297/month |
| 1/8 page color) | 90 | 171/month | 166.50/month | 162/month |




**Back and Front Page ad spaces are available.**

**Contact: Soben Pin, Managing Partner**
**Office:** 45 Merrimack Street. Suite 218A. Lowell, MA 01852
**Tel: 978.677.7163**. **Cell: 978. 656.8141**. **Fax:** 978.677.7092
Email: sobenpin@khmerpost.us
www.khmerpost.us

Schedules and Rates revision and effective September 2015 – August 2016

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

# ភេរវករក្លាយជាអ្នកនយោបាយធ្វើមាតុភូមិនិវត្តន៍

**ដោយឃី សុវុឌ្ឍីនិងហ្សមប៊ រ ភីធឺរ** ।

**October 2, 2015**

ភេរវករដែលទទួលបានការលើកលែងទោស និងជាអ្នកនយោបាយ លោក សួន សេរីរដ្ឋា បានវិលត្រឡប់មកប្រទេសវិញពីការនិរទេសខ្លួនអស់រយៈពេលជាច្រើនឆ្នាំ ហើយបានចុះចតនៅព្រលានយន្តហោះអន្តរជាតិភ្នំពេញ ដោយទទួលបានការស្វាគមន៍យ៉ាងស្ងាត់ស្ងៀមពីអ្នកគាំទ្រប្រហែល២០០នាក់ ចំណែកឯអ្នកគាំទ្រមួយចំនួនបានដឹងតិចតួចថា ហេតុអ្វីពួកគេបានមកទីនេះ ហើយមកទីនេះដោយសារពួកគេទទួលបានអង្ករ និងប្រាក់។

ការវិលត្រឡប់មកមាតុប្រទេសវិញរបស់លោក សេរីរដ្ឋា គឺជាសំណាងដ៏ចម្លែកសម្រាប់អ្នកប្រឆាំងរូបនេះដែលត្រូវបានចាត់ទុកថា ជាភេរវករដោយគណបក្សប្រជាជនកម្ពុជាកាលពីឆ្នាំ ២០១៣ ដោយសំអាងលើភ័ស្តុតាងតិចតួចបំផុត ហើយក៏ត្រូវផ្តន្ទាទោសឱ្យជាប់ពន្ធនាគាររយៈពេលប្រាំពីរឆ្នាំដោយកំបាំងមុខកាលពីខែមករា។

ដោយនឹកស្មានមិនដល់ និងពុំមានការពន្យល់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ដែលជាអ្នករិះគន់ខ្លាំងបំផុតទៅលើលោក សេរីរដ្ឋា បានស្នើសុំការលើកលែងទោសពីព្រះមហាក្សត្រកាលពីខែកក្កដា។ ពីរបីថ្ងៃក្រោយមកក្រសួងមហាផ្ទៃក៏បានអនុញ្ញាតឱ្យគណបក្សអំណាចខ្មែរចុះឈ្មោះដោយមានលោក សេរីរដ្ឋា ជាមេដឹកនាំ។

លោក សេរីរដ្ឋា បានមកដល់ពីការធ្វើដំណើរតាមយន្តហោះពេលព្រឹកពីក្រុងបាងកក ដោយមានជំនួយការនិងទីប្រឹក្សាមួយចំនួនតូច ហើយក៏បានលុតជង្គង់នៅខាងក្រៅកន្លែងមកដល់នៅព្រលានយន្តហោះដោយទទួលបានការប្រោះព្រំទឹកមន្តនិងផ្កាម្លិះពីព្រះសង្ឃ។ ក្រោយមកទៀត លោកក៏ចាប់ផ្តើមរិះគន់រដ្ឋាភិបាល។

លោកបាននិយាយថា "ខ្ញុំមិនដែលទទួលស្គាល់ថា ខ្ញុំមានទោសទេ ហើយខ្ញុំក៏មិនដែលទទួលស្គាល់លើប្រព័ន្ធតុលាការនៅកម្ពុជាដែរ។ តុលាការគ្មានយុត្តិធម៌ទេ ហើយគេមិនអាចផ្តល់យុត្តិធម៌ដល់ជនរងគ្រោះបានឡើយ។ ដូច្នេះទីបញ្ចប់អ្នកដែលប្តឹងខ្ញុំគឺជាអ្នកដែលលើកលែងទោសឱ្យខ្ញុំ"។

លោក សេរីរដ្ឋា បានទម្លាក់ចោលគំនិតធំៗរបស់លោក គឺការបះបោរបែបបដិវត្តផ្កាម្លិះ និងការដាក់មូលដ្ឋានទ័ពអាមេរិកនៅលើកោះភូកុក ដែលកម្ពុជាមិនមែនជាម្ចាស់ ប៉ុន្តែលោកបានសន្យាកាលពីម្សិលមិញថា នឹងជំរុញឱ្យមានការកែទម្រង់រួមមានការបោះឆ្នោតជាដើម។

លោក សេរីរដ្ឋា បាននិយាយថា "ប្រសិនបើប្រព័ន្ធបោះឆ្នោតមិនផ្លាស់ប្តូរឱ្យមានយុត្តិធម៌ និងសេរី ពលរដ្ឋនឹងនៅតែចាញ់។ យើងមិនចង់ឱ្យពលរដ្ឋចាញ់ទេ យើងចង់ឱ្យពលរដ្ឋឈ្នះ ដូច្នេះគេអាចសម្រេចវាសនាជាតិបាន"។

លោក សេរីរដ្ឋា បានឃ្លាតចាកពីប្រទេសកម្ពុជារយៈពេលប្រាំបួនឆ្នាំ គឺភាគច្រើនរស់នៅសហរដ្ឋអាមេរិក ដែលលោកទទួលបានការគាំទ្រពីសហគមន៍ខ្មែរទូទាំងសហរដ្ឋអាមេរិក កាណាដា និងអឺរ៉ុប ដោយធ្វើការរិះគន់យ៉ាងខ្លាំងក្លាទៅលើ

តទៅទំព័រទី ១៨



លោក សួន សេរីរដ្ឋាន ប្រធានគណបក្សអំណាចខ្មែរស្វាគមន៍អ្នកគាំទ្រនៅអាកាសយានដ្ឋានអន្តរជាតិភ្នំពេញកាលពីម្សិលមិញ ពេលធ្វើមាតុភូមិនិវត្តន៍មកដល់កម្ពុជាវិញ បន្ទាប់ពីនិរទ្ទេសខ្លួនទៅបរទេសអស់រយៈពេលជាច្រើនឆ្នាំ ។ រូបថត ស៊ីវ ចាន់ណា

# 'TERRORIST'-TURNED-POLITICIAN MAKES HIS RETURN

**by Zsombor Peter and KhySovuthy** |

**October 2, 2015**

Pardoned terrorist and political hopeful SournSereyRatha returned from years of self-imposed exile Thursday, touching down at Phnom Penh International Airport to a muted welcome from a couple of hundred supporters, some of whom knew little about why they were there and came because they had been given rice and cash.



Mr. Ratha's return capped a bizarre reversal of fortune for the dissident, who was branded a terrorist by the ruling CPP in 2013 on scant evidence and sentenced in absentia to seven years in prison in January.

SournSereyRatha arrives at Phnom Penh International Airport on Thursday after several years in self-imposed exile. (SivChanna/The Cambodia Daily)

Out of the blue and without explanation, Prime Minister Hun Sen-Mr. SereyRatha's loudest critic- engineered his royal pardon in July. A few days later, the Ministry of Interior allowed the Khmer Power Party (KPP) to register, with Mr. SereyRatha at its helm.

Mr. SereyRatha arrived on a mid-morning flight from Bangkok with a small retinue of assistants and advisers and knelt just outside the airport's arrivals gate to be splashed with holy water and pelted with jasmine petals by a group of monks.

After that, he launched into a critique of the government.

"I have never recognized that I was guilty and I have never recognized the court system in Cambodia," he said. "The courts do not have justice, and they cannot give justice to the victims. So in the end the person who sued me is the person who pardoned me."

Mr. SereyRatha has dropped his most strident ideas-an Arab Spring-style uprising and a U.S. military base on Phu Quoc island, which Cambodia does not even own-but he promised Thursday that he would keep pushing for reforms, starting with elections.

"If the election system does not change to be just and free, the people will always lose," he said. "We don't want Cambodian people to lose; we want the people to win, so they can decide the nation's destiny."

Mr. SereyRatha has spent the past nine years away from Cambodia, mostly in the U.S., where he courted support from the Cambodian diaspora across the U.S., Canada and Europe with his populist agenda and his steadfast criticism of Mr. Hun Sen's long-ruling CPP.

The dissident has boasted of being able to call on hundreds of thousands of supporters across Cambodia if he wished. But there has been no sign that this is the case, and his popularity at home remains untested.

Still, hoping to project support,

**Continued to Page 16**

ឌឹ ខេមបូឌា ដេលី The Cambodia Daily
ដំណឹងខ្មែរសម្រង់ពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងបកប្រែដោយមានការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

# លោក ហ៊ុន សែន អំពាវនាវឱ្យបញ្ឈប់ការ លាបពណ៌ដាក់គ្នា ហើយរិះគន់បក្សសង្គ្រោះជាតិ

ដោយ គុជ ណារ៉េន | September 26, 2015

លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានថ្លែងទៅកាន់បងប្អូនជនរួមជាតិខ្មែរមួយក្រុមនៅញ៉ូវយ៉ក កាលពីថ្ងៃព្រហស្បតិ៍ដោយអំពាវនាវឱ្យបញ្ចប់ការលាបពណ៌ដាក់គ្នា និងអះអាងថា លោកនិយាយក្នុងនាមមេដឹកនាំរដ្ឋាភិបាលដែលតំណាងពលរដ្ឋកម្ពុជាទាំងអស់មិនមែនក្នុងនាមអ្នកនយោបាយបក្សទេ។

ទោះជាយ៉ាងនេះក្តីលោកក៏បានឆ្លៀតឱកាសរិះគន់គណបក្សសង្គ្រោះជាតិយ៉ាងខ្លាំងដោយធ្វើការចោទប្រកាន់ជាថ្មីថា គណបក្សប្រឆាំងនេះមានគម្រោងផ្តួលរំលំរូបលោកក្នុង "បដិវត្តពណ៌" នៅអំឡុងពេលបាតុកម្មមហាជនបន្ទាប់ពីការបោះឆ្នោតជាតិដ៏មានជម្លោះនៅឆ្នាំ២០១៣។

លោក ហ៊ុន សែន កំពុងបំពេញទស្សនកិច្ចរយៈពេលបីថ្ងៃនៅញ៉ូវយ៉កដែលលោកនឹងថ្លែងទៅកាន់កិច្ចប្រជុំកំពូលអង្គការសហប្រជាជាតិនៅថ្ងៃសៅរ៍។ កាលពីថ្ងៃព្រហស្បតិ៍លោកបានជួបសំណេះសំណាលជាមួយប្រជាពលរដ្ឋខ្មែរប្រហែល២០០នាក់ដែលរស់នៅក្នុងសហរដ្ឋអាមេរិក និងប្រទេសមួយចំនួនផ្សេងទៀត។ លោកបានប្រាប់អ្នកចូលរួមស្តាប់ថា ជាកំហុសរបស់អ្នកនយោបាយដែលបានបណ្តាលឱ្យពលរដ្ឋខ្មែរជាច្រើនរត់ចោលស្រុកកំណើតក្នុងពេលអតីតកាល ឥឡូវនេះប្រទេសជាតិមានការរីកចម្រើនក្រោមការដឹកនាំរបស់លោក។

លោកបានមានប្រសាសន៍ថា "ខ្ញុំនិយាយពេលនេះក្នុងនាមជាមេដឹកនាំរាជរដ្ឋាភិបាលមិនមែនក្នុងនាមជាមេដឹកនាំគណបក្សនយោបាយនោះទេ ដើម្បីប្រាប់ឱ្យជនរួមជាតិដែលរស់នៅក្រៅប្រទេសដឹងថា ប្រទេសកម្ពុជាកំពុងដើរលើផ្លូវត្រូវ និងកំពុងមានការអភិវឌ្ឍរីកចម្រើនលើគ្រប់វិស័យ"។

លោកបានអំពាវនាវឱ្យបញ្ចប់ការលាបពណ៌ដាក់គ្នា ហើយកុំខ្វល់អំពីរឿងអតីតកាល ហើយផ្តោតទៅលើអនាគតវិញ។

លោកបានមានប្រសាសន៍ថា "សូមបញ្ឈប់លាបពណ៌ដាក់គ្នា គឺយើងកុំខ្វល់ពីអតីតកាលថាអ្វីនោះទេ ព្រោះយើងទាំងអស់គ្នាជាជាតិសាសន៍ខ្មែរតែមួយ" បន្ទាប់មកលោក ហ៊ុន សែន បានចាប់ផ្តើមធ្វើការរិះគន់គណបក្សសង្គ្រោះជាតិដោយនិយាយថា គណបក្សប្រឆាំងនេះបានរំលោភបំពាន "វប្បធម៌សន្ទនា" ដែលរូបលោក និង លោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិបង្កើតឡើងឱ្យមានភាពធូរស្រាលខាងនយោបាយដោយអ្នកទាំងពីរប្រើដើម្បីចរចាកាលពីដើមឆ្នាំនេះ។

លោក ហ៊ុន សែន បានមានប្រសាសន៍ថា "វប្បធម៌សន្ទនា" ដែលបង្កើតឡើងដោយរូបខ្ញុំ និងឯកឧត្តម សម រង្ស៊ី ហាក់មិនមានភាពល្អប្រសើរទាល់តែសោះដោយសារតែភាគីម្ខាងកេងចំណេញខាងនយោបាយបម្រើផលប្រយោជន៍គណបក្សជាជាងបម្រើឱ្យផលប្រយោជន៍ប្រទេស និងប្រជាជនកម្ពុជា"។

ដោយចោទលោក កឹម សុខា អនុប្រធានគណបក្សសង្គ្រោះជាតិថា បានប្រឹងប្រែងបណ្តេញរូបលោកចេញពីតំណែងលោកបានមានប្រសាសន៍ថា "វប្បធម៌សន្ទនាត្រូវបានបង្កើតឡើង ឱ្យពីព្រោះ "ការផ្តួលរំលំតាមរយៈអំណាចរបស់ប្រជាជនមិនអាចមានជោគជ័យតាមរយៈបដិវត្តពណ៌"។

កឹម សុខា បាននិយាយថា "ប្រសិនបើឱ្យគាត់ មិនចុះឱ្យគាត់, នឹងអង្រួនឱ្យ ឱ្យគាត់ធ្លាក់។ នៅពេលខ្ញុំចាប់ដៃជាមួយ លោក កឹម សុខា ខ្ញុំបានសួរថា តើវាមានន័យយ៉ាងម៉េចអង្រួនឱ្យធ្លាក់នោះ?" កឹម សុខា បានឆ្លើយតបមកខ្ញុំវិញថា សម្តេចខ្ញុំតែងតែសរសើរលោកនៅទីបញ្ចប់។ ហើយខ្ញុំបានប្រាប់ឯកឧត្តម កឹម សុខា ថា សំណាងហើយដែលឯកឧត្តមមិនបានធ្វើ។ បើឯកឧត្តមធ្វើថ្ងៃនេះនឹងក្លាយជាថ្ងៃបុណ្យសពរបស់ឯកឧត្តមហើយ"។

លោក កឹម សុខា មិនអាចទាក់ទងបានទេកាលពីម្សិលមិញ។ លោក សម រង្ស៊ី បានមានប្រសាសន៍ថា លោកមិនចង់ផ្តល់ការឆ្លើយតបដោយផ្ទាល់ទៅនឹងការអត្ថាធិប្បាយរបស់លោក ហ៊ុន សែន ទេ ប៉ុន្តែ លោកបានបដិសេធថា គណបក្សសង្គ្រោះជាតិមិនដែលបានស្វះស្វែងផ្តួលរំលំរដ្ឋាភិបាលដោយហិង្សានោះទេ។

លោកបានមានប្រសាសន៍ថា "ខ្ញុំមិនឆ្លើយតបទៅនរណាម្នាក់ទេ ប៉ុន្តែខ្ញុំផ្តល់ទស្សនៈទូទៅ។ ខ្ញុំនិយាយថា គណបក្សសង្គ្រោះជាតមិនដែលមានចេតនាណាមួយក្នុងការប្រើអំពើហិង្សា ឬលើកទឹកចិត្តឱ្យធ្វើសកម្មភាពខុសច្បាប់ទេ។ យើងចាត់ទុកខ្មែរទាំងអស់ជាខ្មែរតែមួយ ហើយមិនចាត់ទុកខ្មែរណាម្នាក់ជាសត្រូវទេ"។ និត



Prime Minister Hun Sen greets Cambodian expatriates in New York on Thursday, in a photo posted to Mr Hun Sen's Facebook page.

# In New York, Hun Sen Laments Slurs, Slams CNRP

BY KUCH NAREN | SEPTEMBER 26, 2015

Prime Minister Hun Sen addressed a group of Cambodian expatriates in New York on Thursday, calling for an end to politically divisive rhetoric and assuring them that he was speaking as a government leader who represented all Cambodians, not as a party politician.

However, he also took the opportunity to lambast the CNRP, reviving the accusation that the opposition party had plotted to overthrow him in a "color revolution" during mass demonstrations following the disputed 2013 national election.

Mr. Hun Sen is on a three-day trip to New York, where he will address a U.N. summit on Saturday. On Thursday, he held a formal reception to meet with about 200 Cambodians living in the U.S. and several other countries. He told the audience that while other politicians' mistakes had led many Cambodians to emigrate in the past, the country was now thriving under his leadership.

"I am delivering this speech as a government leader, not as the CPP president, to inform compatriots living abroad that Cambodia is walking on the right path for development in all sectors," he said.

The prime minister also called for an end to political slurs, asking Cambodians to embrace their commonalities and focus on the future.

"Please, stop smearing each other, meaning that we should not care about the past as we all have the same Khmer blood," he said.

Mr. Hun Sen then launched into a critique of the CNRP, saying that the opposition party had abused the "culture of dialogue" -his and CNRP President Sam Rainsy's name for the political detente they negotiated earlier this year.

"The culture of dialogue created by me and His Excellency Sam Rainsy does not look good, because the other party is exploiting it politically to serve the party's interests rather than the people's and the country's interests," he said.

"The culture of dialogue was created [because] the toppling through so-called 'people's power' couldn't succeed via a color revolution," he added, accusing CNRP Vice President KemSokha of seeking to oust him.

"KemSokha said, 'If [he] doesn't step down, [he] will shake until [he] falls down. When I shook hands with KemSokha, I asked, 'What does it mean to shake until one falls down?' KemSokha replied to me, 'Hmm, Samdech, I have always admired you in the end.

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំនាន់ថ្មីប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

## ប្រេសិតសហប្រជាជាតិថ្លែងជាលើកដំបូងទៅក្រុមប្រឹក្សាសិទ្ធិមនុស្សនៅក្រុងហ្សឺណែវ

**ដោយ Anthony Jensen | September 30, 2015**

លោកស្រី រ៉ូណា ស្មីត អ្នកធ្វើរបាយការណ៍ពិសេសថ្មីរបស់អង្គការសហប្រជាជាតិទទួលបន្ទុកសិទ្ធិមនុស្សប្រចាំប្រទេសកម្ពុជា កាលពីថ្ងៃអង្គារបានថ្លែងនៅក្រុមប្រឹក្សាសិទ្ធិមនុស្សអង្គការសហប្រជាជាតិ (HRC) ក្នុងទីក្រុងហ្សឺណែវជាលើកដំបូងដោយបានប្រាប់អង្គការនេះថា លោកស្រីមានផែនការផ្តោតលើមនុស្សដែលទន់ខ្សោយក្នុងប្រទេសនេះ។

ការបង្ហាញមុខរបស់លោកស្រី ស្មីត នៅក្រុមប្រឹក្សាសិទ្ធិមនុស្សមិនដល់មួយសប្តាហ៍ផង បន្ទាប់ពីលោកស្រីបានបញ្ចប់ដំណើរទស្សនកិច្ចរយៈពេលប្រាំបួនថ្ងៃនៅកម្ពុជាជាដំណើរទស្សនកិច្ចលើកដំបូងរបស់លោកស្រីចាប់តាំងពីទទួលបានការតែងតាំងជាអ្នកស្នងតំណែងបន្តពីលោក សុរិយា ស៊ូបេឌី កាលពីខែមីនា ដែលក្នុងដំណើរទស្សនកិច្ចនោះលោកស្រីបានជួបជាមួយមន្ត្រីរដ្ឋាភិបាល អ្នកនយោបាយបក្សប្រឆាំង និងអ្នកការពារសិទ្ធិមនុស្ស។

លោកស្រី ស្មីត បានមានប្រសាសន៍ថា "បន្ថែមពីលើការពិនិត្យនិងផ្អែកលើកិច្ចការរបស់បុព្វាធិការីរបស់ខ្ញុំខ្ញុំជឿថា ការរួមចំណែករបស់ខ្ញុំអាចត្រូវផ្តោតលើស្ថានការណ៍របស់ក្រុមមនុស្សទន់ខ្សោយ។ ឧទាហរណ៍ជនរងគ្រោះពីការរើសអើងពូជសាសន៍ និងការរើសអើងក្រុមជនជាតិដើមភាគតិចជនអន្តោប្រាម ស្ត្រី កុមារ និងជនពិការ"។

លោកស្រី ស្មីត បានមានប្រសាសន៍ថា ការផ្តល់កម្មសិទ្ធិដីធ្លី និងកិច្ចប្រឹងប្រែងផ្សេងទៀតដើម្បីដោះស្រាយបញ្ហាសិទ្ធិដីធ្លីបាន "ចាប់ផ្តើមឃើញកម្រិតនៃជោគជ័យ"។

លោកស្រីបានបន្ថែមថា "ទោះជាយ៉ាងនេះក្តីកិច្ចការជាច្រើនត្រូវដោះស្រាយទៀត ជាពិសេសចំពោះសហគមន៍ទន់ខ្សោយ ដូចជាជនជាតិដើមភាគតិចជាដើម"។

លោកស្រី ស្មីត ក៏បានចាប់អារម្មណ៍ចំពោះកង្វល់ដែលបានលើកឡើងដោយអង្គការក្រៅរដ្ឋាភិបាលក្នុងស្រុក និងអន្តរជាតិដែលថា សេរីភាពនៃការជួបជុំគ្នា **តទៅទំព័រទី ១៩**

## UN ENVOY MAKES FIRST ADDRESS TO RIGHTS COUNCIL IN GENEVA

**ByAnthony Jensen | September 30, 2015**

Rhona Smith, the U.N.'s new special rapporteur on human rights in Cambodia, on Tuesday addressed the U.N. Human Rights Council (HRC) in Geneva for the first time, telling the body that she planned to focus on marginalized people in the country.

Ms. Smith's appearance at the HRC comes less than a week after she concluded a nine-day trip to Cambodia -her first since being approved as Surya Subedi's successor in March-during which she met with government officials, opposition politicians and human rights defenders.

"In addition to monitoring and building on the work on my predecessors, I believe my contribution could be to focus on the situation of specific marginalized groups," Ms. Smith said. "For example, those victims of race and ethnic discrimination, indigenous peoples, women, children and persons of disabilities."

Ms. Smith said that land-titling and other efforts to address land rights issues were "beginning to see a degree of success."

"However, much remains to be addressed, particularly for the most marginalized communities such as indigenous people," she added.

Ms. Smith also drew attention to concerns expressed by local and international NGOs that the freedoms of assembly, association and expression were being restricted as the country neared commune elections in 2017 and a national election in 2018.

"This is a matter of concern given that the ability of all persons to obtain redress and contribute to finding solutions to land, labor and other disputes so often depends on their ability to peacefully exercise such freedoms,"

**Continued to page 19**

## លោក ហ៊ុន សែន អំពាវនាវឱ្យប្រទេសអ្នកមានអនុវត្តកិច្ចសន្យាផ្តល់ជំនួយ

**ដោយអេឡិក វិល្លឹមមីនស៍ | September 28, 2015**

កាលពីថ្ងៃសៅរ៍លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានថ្លែងសុន្ទរកថាទៅកាន់មហាសន្និបាតអង្គការសហប្រជាជាតិដោយអំពាវនាវឱ្យបណ្តាប្រទេសអភិវឌ្ឍន៍អនុវត្តកិច្ចសន្យារបស់ខ្លួនក្នុងការផ្តល់ជំនួយបរទេសក្នុងទំហំយ៉ាងតិច០.៧ភាគរយនៃចំណូលជាតិសរុបរបស់ពួកគេ។

ថ្លែងនៅក្នុងកិច្ចប្រជុំកំពូលស្តីអំពីគោលដៅអភិវឌ្ឍន៍របស់អង្គការសហប្រជាជាតិលោក ហ៊ុន សែន បានមានប្រសាសន៍ថា វាមានសារៈសំខាន់ដែលបណ្តាប្រទេសអ្នកមានគោរពកាតព្វកិច្ចរបស់ខ្លួនក្នុងការផ្តល់ជំនួយអភិវឌ្ឍន៍ផ្លូវការ។

លោកបានមានប្រសាសន៍ថា "ការសម្រេចបាននូវកុងសង់ស៊ីសលើរបៀបវារៈអភិវឌ្ឍន៍ ក្រោយឆ្នាំ២០១៥ គឺជាសមិទ្ធផលដ៏សំខាន់របស់មេដឹកនាំពិភពលោកនាពេលនេះ។ ក៏ប៉ុន្តែការធានាឱ្យបានថា របៀបវារៈដែលត្រូវបានដាក់ចេញមកនេះ ពិតជានឹងសម្រេចបានជាលទ្ធផលជាក់ស្តែងតាមការរំពឹងទុកនោះ គឺកំពុងតែស្ថិតជាបញ្ហាប្រឈមរបស់យើងទាំងអស់គ្នានៅឡើយ"។

លោកបានមានប្រសាសន៍បន្ថែមថា "ហេតុនេះខ្ញុំយល់ឃើញថា មានកិច្ចការជាគន្លឹះមួយចំនួនដែលយើងទាំងអស់គ្នាត្រូវខិតខំរួមគ្នាធ្វើគឺ១ធានាសម្រេចឱ្យបាននូវការអនុវត្តកិច្ចសន្យាបន្តផ្តល់

**តទៅទំព័រទី ១៦**

## AT UN, HUN SEN CALLS ON RICH NATIONS TO FULFILL AID PLEDGES

**ByAlex Willemyns | September 28, 2015**

Prime Minister Hun Sen used a speech to the U.N. General Assembly on Saturday to call on developed nations to fulfill their pledges to commit at least 0.7 percent of their annual income to foreign aid.

Speaking at a summit on the U.N.'s development goals, Mr. Hun Sen said it was important that wealthy countries respect their obligations for official development assistance (ODA).

"Forging a consensus on the post-2015 development agenda is a major achievement by our global leaders. However, ensuring the success of this agenda remains as a big challenge for all of us," Mr. Hun Sen told the Assembly.

"For this reason, I believe we should all jointly resolve to address the key issues as follows: One, ensuring the fulfillment of donor commitments to achieve the target of 0.7 percent of gross national product in ODA to developing countries, and 0.15 to 0.2 percent of gross national income [GNI] in ODA to the least developed countries," the prime minister added.

Few countries have ever reached either of the goals for aid, which were

**Continued to Page 17**



Prime Minister Hun Sen addresses the UN General Assembly in New York on Saturday. (Reuters)

តមកទំព័រទី ១៩

## លោក ហ៊ុន សែន អំពាវនាវឱ្យប្រទេស...

ជំនួយអភិវឌ្ឍន៍ផ្លូវការពីសំណាក់ប្រទេសអ្នកផ្តល់ជំនួយក្នុងទំហំ០.៧ភាគរយនៃចំណូលជាតិសរុបទៅដល់ប្រទេសកំពុងអភិវឌ្ឍន៍ និងក្នុងទំហំ ០.១៥ ដល់ ០.២០ភាគរយនៃចំណូលជាតិសរុបទៅដល់ប្រទេសមានការអភិវឌ្ឍតិចតួច"។

មានប្រទេសតែបន្តិចបន្តួចប៉ុណ្ណោះដែលសម្រេចនូវគោលដៅសម្រាប់ជំនួយដែលត្រូវបានយល់ព្រមផ្តល់ជាលើកដំបូងដោយមហាសន្និបាតនេះក្នុងឆ្នាំ១៩៧០។ ប៉ុន្តែ លោក ហ៊ុន សែន បានលើកឡើងថា ប្រទេសកម្ពុជាមានការវិវឌ្ឍជាមួយនឹងជំនួយដែលខ្លួនបានទទួលចាប់តាំងពីសន្តិភាពត្រូវបានស្តារឡើងវិញក្នុងទសវត្សរ៍ឆ្នាំ១៩៩០មក។

លោកបានមានប្រសាសន៍ថា "ក្នុងរយៈពេលពីរទសវត្សរ៍កន្លងមកនេះ កម្ពុជាសម្រេចបាននូវការវិវឌ្ឍប្រែប្រួលគួរជាទីមោទនៈ ពិសេសការរក្សាបាននូវសន្តិភាពពេញលេញស្ថិរភាពនយោបាយរឹងមាំ សន្តិសុខ និងសណ្តាប់ ធ្នាប់សាធារណៈល្អប្រសើរ ព្រមទាំងកំណើន សេដ្ឋកិច្ចខ្ពស់ ក្នុងអត្រាជាមធ្យម៧.៧ភាគរយក្នុងមួយឆ្នាំ"។

លោកបានមានប្រសាសន៍បន្ថែមថា "អត្រានៃភាពក្រីក្របានធ្លាក់ចុះយ៉ាងលឿនពីជាង៥៣ភាគរយក្នុងឆ្នាំ២០០៤ មកត្រឹម១៦ភាគរយនៅឆ្នាំ២០១៣ ដែលធ្វើឱ្យកម្ពុជាសម្រេចបាននូវគោលដៅអភិវឌ្ឍន៍សហស្សវត្សរ៍លើការកាត់បន្ថយភាពក្រីក្រ។ចំណែកឯគោលដៅសេសសល់ ក៏ត្រូវបានរំពឹងថា នឹងអាចសម្រេចបាននូវដំណាច់ឆ្នាំ២០១៥នេះដែរ"។

បច្ចុប្បន្នកម្ពុជាកំពុងស្ថិតក្នុងដំណាក់កាលនៃការប្រែប្រួលការកំណត់ចំណូលជាតិសរុប១.០៤៦ដុល្លាររបស់មនុស្សម្នាក់ៗដែល បែងចែកការកំណត់ចំណាត់ថ្នាក់ប្រាក់ចំណូលទាប និងប្រាក់ចំណូលក្រោមមធ្យមរបស់ធនាគារពិភពលោក ដោយតាមការកត់ត្រាបង្ហាញថាប្រាក់ ចំណូលរបស់ពលរដ្ឋម្នាក់ៗគឺ១។០២០ដុល្លារនៅដំណាច់ឆ្នាំ២០១៤។

ការកើនឡើងនេះនឹងធ្វើឱ្យកម្ពុជាមានប្រាក់ចំណូលដូចប្រទេសវៀតណាមដែលចំណូលជាតិសរុបរបស់ពលរដ្ឋម្នាក់ក្នុងប្រទេសនេះកើនពី២៦០ដុល្លារកាលពីឆ្នាំ១៩៩៥ ឱ្យពេលដែលចំណូលជាតិសរុបរបស់ពលរដ្ឋខ្មែរម្នាក់ៗគឺ៣០០ដុល្លារ



ដល់១.៨៩០ដុល្លារក្នុងពេលបច្ចុប្បន្ន នេះបើយោងតាមទិន្នន័យរបស់ធនាគារពិភពលោក។

លោក ទូច វិបុល ប្រធានមូលនិធិសង្គ្រោះជាតិខ្មែរ ជាក្រុមអាណិកជនខ្មែររបស់នៅសហរដ្ឋអាមេរិកដែលគាំទ្រគណបក្សប្រឆាំងនិងដែលធ្វើការតវ៉ានៅខាងក្រៅអង្គការសហប្រជាជាតិអំឡុងដំណើរបំពេញការងាររបស់លោក ហ៊ុន សែន បាននិយាយតាមទូរស័ព្ទថា លោកជឿថា ស្ថិតិរបស់លោកនាយករដ្ឋមន្ត្រីមិនបានបង្ហាញឱ្យឃើញពីវិសមភាពដ៏ធំធេងឡើយ។

លោកបានមានប្រសាសន៍ថា "ជាការពិតយើងឃើញមានអគារខ្ពស់ៗ និងស្ពានខ្ពស់ៗមួយចំនួន ប៉ុន្តែសូមក្រឡេកមើលទីជនបទវិញ ជាទីដែលមានពលរដ្ឋធ្វើចំណាកស្រុកទៅប្រទេសថៃ កូរ៉េ ខាងត្បូង និងប្រទេសម៉ាឡេស៊ី ដើម្បីស្វែងរកការងារធ្វើ ទៅបីជាពលរដ្ឋរបស់យើងត្រូវបានគេរំលោភបំពាននៅទីនោះក៏ដោយ"។

លោកបានមានប្រសាសន៍បន្ថែមទៀតថា "នៅកម្ពុជាអ្វីៗមើលហាក់បីដូចជាអស្ចារ្យខ្លាំងណាស់ ដូចជាឋានសួគ៌អ៊ីចឹង ប្រសិនបើយើងរស់នៅក្នុងរាជធានីភ្នំពេញ ប៉ុន្តែនៅតាមទីជនបទវិញ ពលរដ្ឋគ្មានការងារធ្វើទេ។ វាផ្ទុយទៅនឹងអ្វីដែលលោក ហ៊ុន សែន បានព្យាយាមបញ្ចុះបញ្ចូលមេដឹកនាំអន្តរជាតិនៅទីនេះ"៕ **ស៊ុយ ណាង**

Continued from page 15

## 'TERRORIST'-TURNED-POLITICIAN...

the party lined up about 200 people in neon green KPP shirts waving small Cambodian and American flags to greet Mr. SereyRatha at the airport Thursday.

But out of six green-clad supporters interviewed by reporters, none knew anything about the KPP except that it was headed by Mr. SereyRatha. One woman said she had become a party supporter because the KPP had started showering her and her neighbors with gifts.

"I love the party because [Mr. SereyRatha] is a good person. He helps the people because he provides rice every month," said Chok Lina, who made the trip from Takeo province with a vanload of neighbors.

She said her family started receiving a monthly supply of 50 kg of rice and 50,000 riel (about $12.50) a month from the KPP three months ago, about the same time Mr. SereyRatha was pardoned. She knew nothing about his policies and said the gifts were the only reason she agreed to come to Phnom Penh to greet him.

"It's the same for everyone," she said.

She and her neighbors had been rounded up for the trip to Phnom Penh by Chheang Ron, the KPP's chief for Samraong district. He said he knew nothing about the KPP, either, and had not even heard of the party until three months ago.

Mr. Ron said he had not yet received rice or cash, but believed he would.

"I hope the KPP will help me soon," he said.

Party Plans

Mr. SereyRatha is wasting no time kick-starting his party now that he is back.

The KPP will hold its first party congress today and a training seminar for monks and students on how to become politicians on Saturday. After that, Mr. SereyRatha will embark on a tour of the KPP's provincial offices.

But despite these official activities, Mr. SereyRatha has yet to commit to fielding candidates for the upcoming commune and national elections in 2017 and 2018, respectively. He has set a list of conditions that the government must meet before he enters the races, including an overhaul of the National Election Committee to scrub its membership of all political affiliations.

If the KPP does run, Lev Tol wants to be the party's candidate in Siem Reap. He came out to the airport Thursday in a party shirt and pin, brandishing a megaphone.

"I support SournSereyRatha because the KPP has three big points," he said. "He helps the people; he wants to cancel the National Election Committee; and SournSereyRatha asks that all people have the right to vote, even those who live abroad."

Mr. Tol said he also liked the party president's plans to extend public school instruction from half a day to all day, and wipe all Vietnamese residents without Cambodian citizenship off the voter rolls.

Agreeing to run at all would be another turnaround for Mr. SereyRatha, who has built much of his rebuke of the CPP around the claim that it has stayed in power over the past 22 years thanks to a hopelessly corrupt electoral system.

The government's court case against the dissident was based on his thwarted efforts to have T-shirts distributed across the country just ahead of the 2013 national election, printed with a message urging people not to vote. The case also involved his attempt, amid the street protests that followed the election, to hand out 1,000 yellow roses to police and soldiers posted across Phnom Penh along with stickers that urged them to "turn your guns against the despot," a reference to Mr. Hun Sen.

He was convicted in January of incitement, plotting against the government and obstructing elections.

Rights groups dismissed the case as baseless and politically motivated, and since Mr. SereyRatha's pardon the government has never explained its change of heart about the alleged terrorist. Interior Ministry officials said only that he had changed his ways and would be welcomed back.

Political observers have suggested that the CPP wants Mr. SereyRatha back in Cambodia so he can draw some votes away from its real political opposition, the CNRP, in the coming elections. Both the CPP and the KPP deny the claim.

Mr. Tol, however, put forth an alternate theory.

"SournSereyRatha says the truth," Mr. Tol said. "Maybe the U.S. put pressure on the government [to pardon him] because he is a real democrat."

With his leader back, Mr. Tol was confident that the party could push the CPP out of power come 2018.

"In Siem Reap there are already a lot of people who support the KPP. About 200 people," he said.

# វិធីធម្មជាតិ ព្យាបាលបញ្ហា ស្អុយក្រចកជើង ឬរោគផ្សិតក្នុងក្រចក



មានមនុស្សមួយចំនួនជួបប្រទះបញ្ហាស្អុយក្រចកជើង រឺរោគផ្សិតក្នុងក្រចកដោយគ្មានមូលហេតុ។ ខាងក្រោមនេះជាវិធីធម្មជាតិដែលអាចជួយអ្នកបាន :

**១.** ទឹកខ្មេះព្យាបាលរោគផ្សិតក្នុងក្រចកដោយប្រើទឹកខ្មេះ។ លាយទឹកខ្មេះ ១ ពែង ជាមួយទឹកក្ដៅឧណ្ហៗ ២ កែវ។ ត្រាំជើងរបស់អ្នកទៅក្នុងទឹកដែលលាយរួចរយៈពេល ១៥-២០ នាទី។ បន្ទាប់ពីត្រាំជើងរួចលាងជើងជាមួយទឹកធម្មតា ហើយជូតអោយស្ងួត រឺប្រើម៉ាស៊ីនផ្លុំសក់ផ្លុំវាអោយស្ងួត។ ធ្វើវិធីនេះយ៉ាងហោចណាស់បីដងក្នុងមួយថ្ងៃ។

**២.**ខ្ទឹមសបកខ្ទឹមស ២-៣ កំពឹស រួចហើយបុកវាអោយម៉ដ្ឋ។ លាបខ្ទឹមសដែលបុករួចទៅលើក្រចករបស់អ្នកអោយសព្វ។ បន្ទាប់មករុំដោយស្បែកដើម្បីកុំអោយខ្ទឹមសជ្រុះ ទុកចោល ២ ម៉ោង រឺយូរជាងនេះ។ ធ្វើវិធីនេះ ២ ដងក្នុងមួយសប្ដាហ៍សំរាប់រយៈពេល ៣ សប្ដាហ៍។

ជ្រើសរើសវិធីមួយណាដែលងាយស្រួលសំរាប់អ្នក៕

Continued from page 15

## AT UN, HUN SEN CALLS...

first agreed to by the General Assembly in 1970. Yet Mr. Hun Sen said Cambodia has made progress with the aid it has received since peace was restored in the 1990s.

"Over the past two decades, Cambodia has made remarkable transformations, especially in securing full peace, strong political stability and improved public security, with high economic growth averaging 7.7 percent per annum," he said.

"Poverty rates have been dramatically reduced from 53 percent in 2004 to 16 percent in 2013, making Cambodia achieve the Millennium Development Goal target on poverty reduction," he added.

"The remaining targets are expected to be achieved by the end of 2015. Cambodia is now in transition toward the next stage of development in becoming a lower middle income country by 2016."

Cambodia is currently on the cusp of the $1,046 per-capita GNI limit that divides the World Bank's "low income" and "lower middle income" classifications, with the country recording a per-capita income of $1,020 at the end of 2014.

The leap would put Cambodia in the same bracket as Vietnam, which saw its per-capita GNI rise from $260 in 1995-when Cambodia's was $300-to $1,890 now, according to World Bank data.

Touch Vibol, president of the Cambodia National Rescue Foundation -a group of Cambodian-American opposition supporters who protested outside the U.N. during Mr. Hun Sen's visit-said by telephone that he believed the prime minister's statistics obscured great inequality.

"Of course we can see some high buildings and high bridges, but look at the countryside, where people are fleeing to Thailand and South Korea and Malaysia just to find jobs, even though our people are abused there," Mr. Vibol said.

"In Cambodia, if you live in Phnom Penh, it can seem like everything is perfect-like a paradise. But in the countryside, people just do not have jobs," he said.

"It is opposite to what Hun Sen has tried here to persuade the international leaders."

willemyns@cambodiadaily.com

តមកពីទំព័រទី ១៣

## ភេរវករក្លាយជាអ្នកនយោបាយធ្វើ...

គណបក្សកាន់អំណាចដ៏យូររបស់លោក ហ៊ុន សែន។

អ្នកប្រឆាំងរូបនេះបានអួតថា មានសមត្ថភាពអំពាវនាវដល់អ្នកគាំទ្ររាប់រយរាប់ពាន់នាក់ទូទាំងប្រទេសកម្ពុជាតាមដែលលោកចង់បាន។ ប៉ុន្តែមិនមានសញ្ញាណាមួយដែលថា វាជាករណីបែបនោះទេ ហើយប្រជាប្រិយភាពរបស់លោកនៅក្នុងប្រទេសមិនទាន់មានការការសាកល្បងនៅឡើយទេ។

ទោះជាយ៉ាងនេះក្តី ដោយសង្ឃឹមថា នឹងទទួលបានការគាំទ្រគណបក្សនេះបានរៀបចំតម្រង់ជួរអ្នកគាំទ្រប្រហែល២០០នាក់ ដោយពាក់អាវពណ៌បៃតងរបស់គណបក្សអំណាចខ្មែរដោយត្រវីទង់ជាតិខ្មែរនិងអាមេរិកាំង ដើម្បីទទួលស្វាគមន៍លោក សេរីរដ្ឋា នៅឯព្រលានយន្តហោះកាលពីម្សិលមិញ។

ក្នុងចំណោមអ្នកគាំទ្រប្រាំមួយនាក់ពាក់អាវពណ៌បៃតងដែលសម្ភាសដោយអ្នកយកព័ត៌មានគ្មាននរណាម្នាក់ដឹងអំពីគណបក្សអំណាចខ្មែរទេលើកលែងតែថា គណបក្សនេះដឹកនាំដោយលោក សេរីរដ្ឋាតែប៉ុណ្ណោះ។ ស្ត្រីម្នាក់បាននិយាយថា អ្នកស្រីបានក្លាយជាអ្នកគាំទ្របក្សដោយសារតែគណបក្សអំណាចខ្មែរបានជួយផ្តល់អំណោយដល់អ្នកស្រី និងអ្នកជិតខាង។

អ្នកស្រី ចក់ លីណា ដែលធ្វើដំណើរពីខេត្តតាកែវ តាមរថយន្តទូរីសជាមួយអ្នកជិតខាងបាននិយាយថា "ខ្ញុំស្រឡាញ់គណបក្សនេះ ពីព្រោះឱ្យលោក សេរីរដ្ឋាឧ ជាមនុស្សល្អ។ គាត់ជួយប្រជាពលរដ្ឋ ពីព្រោះគាត់ឱ្យអង្ករយើងរាល់ខែ"។

អ្នកស្រីបាននិយាយថា គ្រួសារអ្នកស្រីទទួលបានជំនួយជាអង្ករ៥០គីឡូក្រាមនិងប្រាក់៥០.០០០រៀលរាល់ខែពីគណបក្សអំណាចខ្មែរអស់រយៈពេលបីខែមកហើយ ជាពេលដែលលោក សេរីរដ្ឋា ទទួលបានការលើកលែងទោស។ អ្នកស្រីមិនបានដឹងអំពីគោលនយោបាយរបស់បក្សទេ ហើយបាននិយាយថា ការទទួលបានអំណោយគឺជាហេតុផលដែលអ្នកស្រីយល់ព្រមធ្វើដំណើរមកក្រុងភ្នំពេញ ដើម្បីទទួលស្វាគមន៍លោកប្រធានបក្ស។

អ្នកស្រីបាននិយាយថា "អ្នកផ្សេងទៀតក៏ដូចគ្នាដែរ□។

អ្នកស្រីនិងអ្នកជិតខាងបានប្រមូលគ្នាធ្វើដំណើរមកភ្នំពេញដោយលោក ឈាង រុន ជាប្រធានគណបក្សអំណាចខ្មែរប្រចាំស្រុកសំរោង។ លោក រុន បាននិយាយថា លោកមិនបានដឹងអ្វីទាំងអស់ទាក់ទងនឹងគណបក្សអំណាចខ្មែរ ហើយក៏មិនបានឮអំពីគណបក្សនេះដែរ ទើបតែដឹងបីខែមុនប៉ុណ្ណោះ។

លោក រុន បាននិយាយថា លោកមិនទាន់បានទទួលអំណោយជាអង្ករ ឬជាលុយកាក់ទេ ប៉ុន្តែ លោកជឿថា លោកនឹងទទួលបាន។

លោកបាននិយាយថា "ខ្ញុំសង្ឃឹមថា គណបក្សអំណាចខ្មែរនឹងជួយខ្ញុំឆាប់ៗនេះ"។

**គម្រោងគណបក្ស**

លោក សេរីរដ្ឋា មិនបង្អែរបង្អង់យូរទេ ព្រោះថាលោកវិលមកវិញហើយ។

គណបក្សអំណាចខ្មែរ នឹងធ្វើសមាជបក្សដំបូងនៅថ្ងៃនេះ ហើយនឹងមានសិក្ខាសាលាបណ្តុះបណ្តាលសម្រាប់ព្រះសង្ឃ និងនិស្សិតអំពីភាពជាអ្នកនយោបាយនៅថ្ងៃសៅរ៍។ បន្ទាប់មកលោក សេរីរដ្ឋា នឹងធ្វើដំណើរទៅកាន់ការិយាល័យនានាតាមខេត្តរបស់គណបក្សអំណាចខ្មែរ។

ប៉ុន្តែទោះបីជាមានសកម្មភាពជាផ្លូវការទាំងនេះក៏ដោយ ក៏លោក សេរីរដ្ឋា មិនទាន់ដាក់បេក្ខជនឱ្យឈរឈ្មោះក្នុងការបោះឆ្នោតឃុំសង្កាត់ និងការបោះឆ្នោតជាតិនាឆ្នាំ២០១៧ និងឆ្នាំ២០១៨ដែរ។

លោកមានលក្ខខណ្ឌមួយចំនួនដែលរដ្ឋាភិបាលត្រូវបំពេញមុននឹងលោកចូលរួមប្រកួតប្រជែង រួមមានការកែទម្រង់គណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត ដើម្បីលុបបំបាត់សមាជិកភាពដែលមាននិន្នាការនយោបាយទាំងអស់។

ប្រសិនបើគណបក្សអំណាចខ្មែរចូលរួម លោក ឡេវ តុល ចង់ធ្វើជាបក្ខជនគណបក្សប្រចាំខេត្តសៀមរាប។ លោកបានធ្វើដំណើរមកព្រលានយន្តហោះកាលពីម្សិលមិញដោយពាក់អាវបក្ស ហើយកាន់ក្បាលមេក្រូ។

លោកបាននិយាយថា "ខ្ញុំគាំទ្រ សួន សេរីរដ្ឋា ពីព្រោះគណបក្សអំណាចខ្មែរ មានចំណុចបីធំៗ។ គាត់ជួយពលរដ្ឋគាត់ចង់លុបចោលគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត ហើយ សួន សេរីរដ្ឋា ចង់ឱ្យពលរដ្ឋទាំងអស់មានសិទ្ធិបោះឆ្នោត សូម្បីតែអ្នកនៅក្រៅប្រទេសក៏អីចឹងដែរ"។

លោក តុល បាននិយាយថា លោកក៏ចូលចិត្តគម្រោងរបស់លោកប្រធានបក្សក្នុងការពង្រីកការបង្រៀនតាមសាលាសាធារណៈពីកន្លះថ្ងៃទៅពេញមួយថ្ងៃ ហើយលុបបំបាត់ឱ្យអស់នូវពលរដ្ឋវៀតណាមដែលគ្មានសញ្ជាតិខ្មែរចេញពីបញ្ជីបោះឆ្នោត។

ការយល់ព្រមចូលរួមការបោះឆ្នោតនឹងជាការផ្លាស់ប្តូរចិត្តសម្រាប់លោក សេរីរដ្ឋា ដែលបានរិះគន់យ៉ាងច្រើនទៅលើគណបក្សប្រជាជនកម្ពុជាទាក់ទងនឹងការអះអាងថា គណបក្សនេះកាន់អំណាចជាង២២ឆ្នាំ ដោយសារតែ

**តទៅទំព័រទី១៩**





## ការវិភាគ

របស់ព្រះតេជព្រះគុណបណ្ឌិត ហុក សាវណ្ណ

**សិទ្ធិធ្វើបាតុកម្មមាន សុំមិនឲ្យ ធ្វើបង្ក្រាប តើឲ្យពលរដ្ឋដើរផ្លូវណា?**

មាត្រា៣៧នៃរដ្ឋធម្មនុញ្ញខ្មែរបច្ចុប្បន្នចែងថា ពលរដ្ឋខ្មែរមានសិទ្ធិធ្វើកូដកម្ម និងបាតុកម្មដោយសន្តិវិធី។ ពេលពលរដ្ឋសុំហែធ្វើបាតុកម្មដោយសន្តិវិធី អាជ្ញាធរ ពិសេសក្រសួងមហាផ្ទៃតែងនិយាយថា មិនអនុញ្ញាត ព្រោះខូចសណ្តាប់ធ្នាប់សាធារណៈ ស្ទះចរាចរណ៍ ពលរដ្ឋខ្មែរគ្មានជម្រើសក៏ចាប់ធ្វើ អាជ្ញាធរក៏ចាប់បង្ក្រាប ដោយចោទថាបាតុកម្មគ្មានច្បាប់។ សុំមិនឲ្យធ្វើបង្ក្រាបតើឲ្យពលរដ្ឋដើរផ្លូវណា?ដាក់កំហុសទៅលើពលរដ្ឋជានិច្ច។ ការបង្ក្រាបមានពេលខ្លះប្រើហិង្សាធ្វើឲ្យពលរដ្ឋត្រូវរបួសរហូតស្លាប់ក៏មាន។ ប្រទេសកាន់របបប្រជាធិបតេយ្យ គេគ្រាន់តែជូនដំណឹងពុំមែនសុំអនុញ្ញាតទេ អាជ្ញាធរគេក៏ចាត់អ្នករក្សាសន្តិសុខឲ្យរក្សារបៀបរៀបរយតាមទំហំបាតុកម្ម។ អំពីការចាប់បាតុករដាក់ពន្ធនាគារដោយចោទថាប្រើអំពើហិង្សា។ តាមសាក្សីឃើញនឹងភ្នែកអំពើហិង្សាតែងកើតមានពីអាជ្ញាធរផ្តើមមុន ហើយអាចមានបាតុករខ្លះទ្រាំមិនបានវាយតបវិញដើម្បីការពារខ្លួន។ កាលគណបក្សសង្គ្រោះជាតិធ្វើបាតុកម្មអហិង្សាជិតមួយឆ្នាំគ្មានកើតហេតុអ្វីឡើយ ព្រោះអាជ្ញាធរមិនបង្ក្រាប។ ដូច្នេះ ការកាត់ទោសសកម្មជនគណបក្សសង្គ្រោះជាតិជាង១០នាក់ ជាការខុសច្បាប់ ត្រូវតែដោះលែងដោយគ្មានលក្ខខណ្ឌ។

មាត្រា៤០នៃរដ្ឋធម្មនុញ្ញចែងថា ការឆែកឆេរលំនៅឋាន សម្ភារៈវត្ថុ និងរូបបុគ្គលត្រូវធ្វើឲ្យស្របនឹងបញ្ញត្តិច្បាប់។ ដូច្នេះ កាលដែលអាជ្ញាធរក្រុងភ្នំពេញចុះឆែកឆេរព្រះសង្ឃវត្តមុនីរង្សីវត្តខ្មែរកម្ពុជាក្រោមដោយគ្មានដីកាពីតុលាការ ជាការខុសច្បាប់។មាត្រា៣៨ចែងថា ការចោទប្រកាន់ ការចាប់ខ្លួន ការឃាត់ខ្លួន ឫការឃុំខ្លួនជនណាមួយនឹងអាចធ្វើទៅកើតលុះត្រាតែអនុវត្តត្រឹមត្រូវតាមបញ្ញត្តិច្បាប់។ដូច្នេះ យុវជនពរូបជាចលនាមាតាធម្មជាតិនៅខេត្តកោះកុងប្រឆាំងនឹងក្រុមហ៊ុនវៀតណាមដែលបូមខ្សាច់ធ្វើឲ្យបាក់ដីខូចបរិស្ថាន បានត្រូវអាជ្ញាធរចាប់ឃុំគម្រាមកំហែង ជាការចាប់ខុសច្បាប់ ត្រូវតែដោះលែង។

វត្តខ្មែរកាណាដា,ថ្ងៃ១៩កញ្ញា២០១៥;www.hoksavannhok;savannhok@yahoo.com

តមកពីទំព័រទី ១៨
## ភេរវិករក្លាយជាអ្នកនយោបាយធ្វើ...

ប្រព័ន្ធបោះឆ្នោតពុករលួយ។

ការប្ដឹងផ្ដល់របស់រដ្ឋាភិបាលប្រឆាំងនឹងលោក សេរីរដ្ឋា បានផ្អែកលើការប្រឹងប្រែងមិនបានសម្រេចក្នុងការចែកចាយអាវយឺតទូទាំងប្រទេសមុននឹងមានការបោះឆ្នោតជាតិឆ្នាំ២០១៣ ដែលមានសារអំពាវនាវឱ្យពលរដ្ឋមិនចូលរួមបោះឆ្នោត។ រឿងក្ដីនេះក៏ជាប់ពាក់ព័ន្ធទៅនឹងការប៉ុនប៉ងរបស់លោកក្នុងពេលមានការតវ៉ាតាមដងផ្លូវដែលកើតឡើងបន្ទាប់ពីការបោះឆ្នោត ដើម្បីចែកផ្កាកុលាប១.០០០ទងឱ្យប៉ូលិស និងទាហានទូទាំងភ្នំពេញរួមមានក្រដាសបិទផ្សព្វផ្សាយដែលជំរុញឱ្យពួកគេ "បែរកាណុងកាំភ្លើងដាក់ជនផ្ដាច់ការ" ដែលជាការសំដៅទៅលើលោក ហ៊ុន សែន។

លោក សេរីរដ្ឋា ត្រូវបានផ្ដន្ទាទោសឱ្យជាប់ពន្ធនាគារកាលពីខែមករាពីបទញុះញង់ប៉ុនប៉ងផ្ដួលរំលំរដ្ឋាភិបាល និងរារាំងការបោះឆ្នោត។

ក្រុមការពារសិទ្ធិមនុស្សបានទាត់ចោលករណីនេះថាគ្មានមូលដ្ឋានច្បាស់លាស់ និងថាជារឿងនយោបាយ ហើយចាប់តាំងពីការលើកលែងទោសរបស់លោក សេរីរដ្ឋា នោះមករដ្ឋាភិបាលមិនដែលពន្យល់អំពីការផ្លាស់ប្ដូរចិត្តរបស់ខ្លួនទាក់ទងនឹងភេរវិកររូបនេះទេ។ មន្ត្រីក្រសួងមហាផ្ទៃគ្រាន់តែនិយាយថា លោក សេរីរដ្ឋា បានផ្លាស់ប្ដូរឥរិយាបថរបស់លោក ហើយនិងស្វាគមន៍ឱ្យលោកមកវិញ។

អ្នកសង្កេតការណ៍នយោបាយបានបញ្ជាក់ថា គណបក្សប្រជាជនកម្ពុជាចង់ឱ្យលោក សេរីរដ្ឋា វិញមកកម្ពុជាវិញ ដើម្បីឱ្យលោកអាចអូសទាញសន្លឹកឆ្នោតចេញពីគណបក្សប្រឆាំងពិតប្រាកដគឺគណបក្សសង្គ្រោះជាតិ ក្នុងការបោះឆ្នោតខាងមុខ។ ទាំងគណបក្សប្រជាជនកម្ពុជាទាំងគណបក្សអំណាចខ្មែរ បានបដិសេធចំពោះការអះអាងនេះ។

ទោះជាយ៉ាងនេះក្ដី លោក តុល មានទស្សនៈមួយ។

លោក តុល បាននិយាយថា "សួន សេរីរដ្ឋា និយាយការពិត។ ប្រហែលសហរដ្ឋអាមេរិកដាក់គំនាបលើរដ្ឋាភិបាលឱ្យលើកលែងទោសដល់គាត់ "ពីព្រោះគាត់ជាអ្នកប្រជាធិបតេយ្យពិតប្រាកដ"។

ដោយមានមេដឹកនាំរបស់លោកវិលមកមាតុភូមិវិញ លោក តុល ជឿជាក់ថា គណបក្សនឹងរុញឱ្យគណបក្សប្រជាជនកម្ពុជាខ្ចាតចេញពីអំណាចនៅក្នុងការបោះឆ្នោតឆ្នាំ២០១៨ខាងមុខនេះ។

លោកបាននិយាយថា "នៅខេត្តសៀមរាបមានពលរដ្ឋច្រើនដែលគាំទ្រគណបក្សអំណាចខ្មែរគឺប្រហែល២០០នាក់"៕ **វើន**

តមកពីទំព័រទី ១៥
## ប្រេសិតសហប្រជាជាតិថ្លែង...

សមាគម និងការសម្ដែងមតិកំពុងត្រូវរឹតបន្ដឹងនៅពេលដែលប្រទេសនេះជិតដល់ការបោះឆ្នោតឃុំសង្កាត់នៅ២០១៧ និងការបោះឆ្នោតជាតិនៅឆ្នាំ២០១៨។

អ្នកធ្វើរបាយការណ៍ពិសេសរូបនេះបាននិយាយថា "នេះជាបញ្ហាកង្វល់ដោយហេតុថា លទ្ធភាពនៃមនុស្សទាំងអស់ទទួលបានសំណាង និងរួមចំណែកដល់ការស្វែងរកដំណោះស្រាយដីធ្លី ការងារ និងជម្លោះផ្សេងទៀត ជាញឹកញាប់ផ្អែកលើលទ្ធភាពរបស់ពួកគេក្នុងការប្រើសេរីភាពបែបនេះដោយសន្តិវិធី"។

ក្នុងការឆ្លើយតបទៅនឹងការថ្លែងរបស់លោកស្រី ស្មីត តំណាងអចិន្ត្រៃយ៍របស់ប្រទេសកម្ពុជាប្រចាំការិយាល័យអង្គការសហប្រជាជាតិនៅក្រុងហ្សឺណែវ លោក នៃ សំអុល បានប្រាប់ក្រុមប្រឹក្សាសិទ្ធិមនុស្សថា រដ្ឋាភិបាលកម្ពុជាបានប្ដេជ្ញាពង្រឹងនីតិរដ្ឋ និងបានរីកចម្រើនក្នុងការដោះស្រាយជម្លោះដីធ្លី។

លោក សំអុល បានមានប្រសាសន៍ថា "គ្មានការបណ្ដេញចេញទាំងបង្ខំទេក្នុងគោលនយោបាយកម្ពុជា"។ លោកបានបន្ថែមថា រដ្ឋាភិបាលកម្ពុជា "ទទួលស្គាល់ជាបណ្ដោះអាសន្ននូវសិទ្ធិរបស់ប្រជាពលរដ្ឋចំពោះការកាន់កាប់ដីធ្លីដោយខុសច្បាប់ រហូតដល់ពួកគាត់ស្វែងរកកន្លែងស្នាក់នៅដោយស្របច្បាប់បាន"៕ **មានិត**

**Continued from page 15**
## UN ENVOY MAKES FIRST …

the special rapporteur said.

In response to Ms. Smith's speech, the permanent representative of Cambodia to the U.N. office at Geneva, Ney Samol, told the HRC that the Cambodian government was committed to strengthening the rule of law and had made progress in addressing land issues.

"There is no room for forced evictions in Cambodian policy," Mr. Samol said, adding that the Cambodian government "temporarily recognizes the people's right to illegal land occupation until they find a legal place of residence."

jensen@cambodiadaily.com

"អត្ថបទទស្សនៈ ថវិការគ្រួសារជាអ្វី?"

# និយាយពីក្រ និងមាន

## ភាគ៧ - ការពារសេដ្ឋកិច្ចគ្រួសារ

**ដោយ ពិន សំខុន**


ពិន សំខុន

នៅភាគនេះ ខ្ញុំសូមលើកយកប្រយោគខ្លីមួយមកបញ្ជាក់ឱ្យមានយើងកាន់តែមានការជាប់ចិត្តកាន់តែខ្លាំងលើពាក្យ"សន្សំ"ឱ្យអត្ថន័យកាន់តែត្រឹមត្រូវកុំឱ្យការសន្សំរបស់យើងក្លាយទៅជាការលេងសើចហើយបែរជាប្រមូលអារម្មឱ្យព្យាយាមសន្សំមិនបាន។

"ស្លាប់ឆ្លាត"នេះជាឈ្មោះរឿងខ្លីមួយដែលមានន័យវែងប្រឌិតឡើងយ៉ាងច្នៃដន្យដោយមិត្តខ្ញុំម្នាក់ឈ្មោះ ញ៉ុយ ចំរើន ជាអនុបណ្ឌិតខាងហិរញ្ញវត្ថុដែលបានឱ្យឱវ៉ាត នារាត្រីជប់លៀងនៅហ្វីឡាដែលហ្វៀមួយថា បំណាច់នឹងស្លាប់សូមឱ្យ"ស្លាប់ឆ្លាត"។ គាត់ថា ចាស់ៗខ្មែរយើងចូលចិត្តប្រដៅកូនចៅឱ្យចេះដឹងគុណចាស់ទុំដល់ពេលគាត់រៀបនឹងស្លាប់គាត់ប្រដៅកូនចៅគាត់ទៀតថា "កុំឱ្យទើសទាល់អី ដល់អញស្លាប់ទៅយកខ្មោចអញទៅចោលឯណាក៏បានដែរ"ចំរើនសើចចំអកផង គក់ទ្រូងផងបន្តថា "ចង់ឱ្យក្មេងដឹងគុណផង? បើពេលស្លាប់មិនត្រឹមតែគ្មានទុកកេរអីឱ្យកូនចៅទេ ថែមទាំងចង់ឱ្យគ្នាជាប់គុកទៀត! បើធ្វើតាមគាត់ ហើយយកខ្មោចគាត់ទៅបោះចោលក្នុងព្រៃមែននោះ មុខជាមានទោសជាប់គុកជាមិនខាននេះបានហៅថាឆោតមែន!"។

"ស្លាប់ឆ្លាត"របស់ ញ៉ុយ ចំរើន នេះគាត់ចង់ប្រាប់ពីគំរូពួកស្បែកសដែលរស់ជុំវិញយើងថា គេបង្វិលការស្លាប់របស់ចាស់ៗពួកគេឱ្យទៅជាសម្បត្តិទុកដាក់ឱ្យកូនចៅមិនឱ្យរហាមតទៅទៀតឡើយ ។ នឹកទៅដល់ពេលដើមកាលពីនៅស្រុកខ្មែរវាគ្មានហេថារចនាសម្ព័ន្ធហិរញ្ញវត្ថុណាជួយយើងឱ្យសន្សំក្រៅតែពីក្នុងរង្វង់ក្រុមគ្រួសារខ្លួនឯងនោះទេ ដូច្នេះខិតខំសន្សំទិញដីសង់ផ្ទះមានមាសប្រាក់ទុកចែកឱ្យកូនចៅតែប៉ុណ្ណោះ។ ចុះឥឡូវមកដល់ស្រុកអាមេរិកហើយ តើមានដឹងថា គេធ្វើអ្វីខ្លះទេ ដើម្បីឱ្យមាន? គឺគេប្រឹងប្រែងធ្វើការឱ្យទៀងទាត់ទាំងប្តីទាំងប្រពន្ធ -សន្សំផង បញ្ជូនកូនចៅទៅរៀនឱ្យបានខ្ពស់ផង -រីឯលុយដែលសន្សំនោះ គេដាក់ឱ្យធ្វើការសន្សំយកការប្រាក់បន្ថែមទៀត -ជាពិសេសទៅទៀត ដើម្បីរក្សាសម្បត្តិឱ្យគង់វង់រក្សាជីវិតឱ្យបានវែងគេបង់ប្រាក់ធានាសម្បត្តិធានាជីវិត ដើម្បីថែវាឱ្យគង់កុំឱ្យប៉ះពាល់ដល់អនាគតកូនចៅគេ។ ហេតុដូច្នេះហើយបានជាគេឃើញជនជាតិអាមេរិកាំងចេះតែពូកែទៅៗចេះតែមានទៅមានទៅដោយសារតែគេបានប្រឹងប្រែងសន្សំនឹងការពារទូទាំងប្រទេស



គ្មានឈប់ឈរពេលមានមនុស្សស្លាប់ម្តងៗ គឺនឹងមានអ្នកមានថ្មីមួយចំនួនកើតឡើងពេលនោះឯង។ ចុះខ្មែរយើងវិញ? ស្ថិតិបានបង្ហាញថាសហគមន៍យើងមិនសូវមានអ្នករៀនសូត្រជ្រៅជ្រះអ្នកមានសម្បត្តិគ្រប់គ្រាន់ក៏មានតិចតួចមានអ្នកធ្វើការងារធំៗគ្រប់គ្រងមិនច្រើនទេ ថែមពីនោះ មានជម្ងឺផ្លូវកាយនឹងផ្លូវចិត្តក៏ច្រើនមានបញ្ហាគ្រួសារក៏សម្បូរ ដូច្នេះផ្ទុយពីពួកស្បែកសតែមាន




មនុស្សស្លាប់ គឺមានតែសោកនាថកម្មតែប៉ុណ្ណោះមិនមានផលចំនេញថ្មីមកដល់គ្រួសារទេ។ ញ៉ុយ ចំរើន និយាយថា សុំតែមួយទៅចុះ "ថាបើស្លាប់ឱ្យឆ្លាត" គឺបង់ប្រាក់ធានាជីវិតសម្រាប់ទុកដាក់ឱ្យកូនចៅកុំឱ្យបង្កើតពួកគេមកហើយ ទុកឱ្យគ្នានៅអនាថា បែកឪម៉ែស្លាប់ចោលទៅដោយគ្មានទុកកេរអ្វីសោះនោះ! បើបានបង់ Premium មិនឱ្យដាច់បានហើយនោះ គេហៅថា "ស្លាប់ឆ្លាត" បានហើយ បើយើងមិនមានក៏ហីទៅចុះតែត្រូវខំទិញការធានជីវិតឱ្យបាន។

អនាគតគឺឥឡូវនេះស្ត្រីក្មេងម្នាក់អាយុ៣០ឆ្នាំឈ្មោះ អេនី បាននិយាយថា ខ្លួនមានការធានាជីវិតចំនួន៤ម៉ឺនពីកាងារសព្វថ្ងៃរបស់ខ្លួន បើខ្លួនមានគ្រោះថ្នាក់ដល់ជីវិតណាមួយប្រាក់នោះនឹងបាន

**តទៅទំព័រទី ២៣**



**KhmerPost USA, LLC**
**សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក**

អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA

ផ្សាយពាណិជ្ជកម្ម Advertising
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office)
អ៊ីម៉ែលsobenpin@khmerpost.us
ផ្សារពាណិជ្ជកម្ម ហ្វីឡាដែលហ្វៀ SomrithSom

អ្នកនិពន្ធ Editorials
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us
អ្នកនិពន្ធកិត្តិយស Contributed Writers:
Kim Phien, Richard Howe ,Jr.
យកព័ត៌មាន Chharly Yon (504) 912 2660
ច្នៃសោភ័ណភាពកាសែត Design Artist
Heng Chhunleng
នាយករដ្ឋបាល Office Manager 978-677-7163
Thach Vanna ថាច់ វណ្ណា

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at or Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# ទឹកអំពៅមានអត្ថប្រយោជន៍ច្រើនណាស់ដល់សុខភាព





ទឹកអំពៅមិនត្រឹមតែមានរស់ជាតិផ្អែមឆ្ងាញ់នោះទេ ប៉ុន្តែក្នុងទឹកអំពៅមានសារធាតុចិញ្ចឹមជាច្រើនដែលអាចផ្តល់នូវអត្ថប្រយោជន៍យ៉ាងច្រើនចំពោះសុខភាពមនុស្សជាតិ។ អ្នកជំនាញផ្នែកសុខភាពបានអះអាងថា អត្ថប្រយោជន៍ដែលអ្នកអាចទទួលបានពីការទទួលទានទឹកអំពៅមានដូចជា -ទឹកអំពៅសំបូរទៅដោយវីតាមីន និងសារធាតុរ៉ែជាច្រើនដែលអាចការពារអ្នកពីជំងឺផ្តាសាយ និងឈឺកបាន (ទទួលទានដោយមិនដាក់ទឹកកក)។

-ទឹកអំពៅមានកម្រិតជាតិផ្អែមបែបធម្មជាតិខ្ពស់ដែលយើងអាចទទួលទានបានដោយមិនចាំបាច់បន្ថែមស្ករនោះទេ។ ដូចនេះអ្នកដែលមានជំងឺទឹកនោមផ្អែមអាចរីករាយនឹងការទទួលទានវាបានដោយមិនមានការព្រួយបារម្ភពីផលវិបាកនៃការលើសជាតិស្ករក្នុងឈាមឡើយ។

-ពេលដែលអ្នកទទួលរងនូវអាការខ្សោះជាតិទឹកធ្ងន់ធ្ងរ ឬក៏អស់កម្លាំងខ្លាំងទឹកអំពៅជាភេសជ្ជៈមួយដែលអ្នកគួរតែទទួលទាន ព្រោះថាវាអាចជួយបង្កើនកម្រិតជាតិស្ករក្នុងឈាមបាន។

- នៅពេលដែលអ្នកគ្រុនក្តៅ និងបាត់បង់ប្រូតេអ៊ីនពីក្នុងរាងកាយនោះ ទឹកអំពៅអាចជួយបញ្ចុះសីតុណ្ហភាពក្នុងរាងកាយ និងផ្តល់ប្រូតេអ៊ីនដល់រាងកាយអ្នកបាន។

- ទឹកអំពៅក៏អាចព្យាបាលជំងឺជំងឺលឿងបានដែរ។

- ទឹកអំពៅមានកម្រិតជាតិប៉ូតាស្យូមខ្ពស់ដែលអាចជួយសំរួលដល់ប្រព័ន្ធរំលាយអាហារ និងការទល់លាមកបាន។ ការទទួលទានទឹកអំពៅទៀងទាត់អាចជួយពង្រឹងប្រព័ន្ធភាពសាំុក្នុងរាងកាយ និងធ្វើអ្នកឆាប់ជាសះស្បើយពីរបួសបានយ៉ាងមានប្រសិទ្ធភាព។

**អត្ថបទ: KHMERPRESS**



## Khmer Post Subscription form

Khmer Post subscription is $10 for 1month -$30 for 3 month - $50 for 6 months and $100 for12 months

The price is only for mailing - We send your personal mail via Post office.

យើងទទួលយកតែ"ម៉ានីអ័រឌឺ"តែប៉ុណ្ណោះ -We accept Money order -Check

អាស័យដ្ឋាន Khmer Post address :45 Merrimack St.Suite 218A Lowell, MA 01852

ទូរស័ព្ទ Phone : off.978 677 7163 -Soben's Cell.978-656 8141

- Roger Cell. 978 - 942 1641

<<www.Khmerpostusa.us>> publication is 2 issues per month

### បណ្ណបញ្ជាទិញកាសែត"ខ្មែរផុសស.រ.អា"
### Khmer Post subscription order

ឈ្មោះ - My name.......................................................................

អាស័យដ្ឋាន -Address...................................................................

.........................................................................................

ខ្ញុំចង់ជាវកាសែតខ្មែរផុសស.រ.អា..................ខែ.........តម្លៃជាវ.............ដុល្លារ

I'd like to subscribe Khmer Post USA for ..........
Month(s)-Subscrition price $.......................

# ផ្លែទាបតែ១ផ្លែផ្តល់នូវអត្ថប្រយោជន៍លើសពីការស្មាន

អ្នកអាចយកផ្លែទាបទៅធ្វើជាការ៉េម, ទឹកដោះគោ, ទឹកផ្លែឈើ... ព្រោះវារសជាតិដ៏ឈ្ងុយឆ្ងាញ់ ហើយបាននូវផ្តល់អត្ថប្រយោជន៍យ៉ាងច្រើនចំពោះសុខភាព ។ វាមានផ្ទុកនូវសារធាតុចិញ្ចឹមជាច្រើនដូចជា: សារធាតុខនិជ, វីតាមីន, ជាតិសរសៃ និងប្រូតេអ៊ីន ។

ខាងក្រោមនេះនឹងបង្ហាញអំពីបរិមាណសារធាតុចិញ្ចឹមនៅក្នុងផ្លែទាប១ផ្លែ:

- -ជាតិម៉ាញ៉េស្យូម ៥២.៥០ក្រាម (13%)
- -ទីមីន ០.២៧៥ក្រាម (18%)
- -ហ្វូឡេត (Folate) ៣៥.០០ក្រាម (9%)
- -ជាតិសរសៃ ១១ក្រាម (44%)
- -ជាតិដែក ១.៥០មង (8%)
- -ជាតិប៉ូតាស្យូម ៦១៧.៥០mg (13%)
- -នីស៊ីន (Niacin) ២.២០៨mg (11%)
- -វីតាមីន B៦ ០.៥ mg (25%)
- -វីតាមីន C ៩០.៨mg (151%)
- -ទង់ដែង ០.២១៥mg (11%)

**អត្ថប្រយោជន៍សុខភាពទាំង១៣យ៉ាងដែលបានពីផ្លែទាប**

**ជួយរក្សាកម្រិតជាតិស្ករ**

អាហារ និងឱសថនៅសហរដ្ឋអាមេរិចចម្រាញ់ចេញពីផ្លែទាប៣៨ក្រាមសម្រាប់មនុស្សប្រុសពេញវ័យ និង២៥ក្រាមសម្រាប់មនុស្សស្រីពេញវ័យ ។ ដោយសារអាហារនេះសំបូរទៅដោយជាតិសរសៃ ដូច្នេះវាអាចជួយកាត់បន្ថយជាតិស្ករជួយកាត់បន្ថយភាពគ្រោះថ្នាក់នៃជំងឺទឹកនោមផ្អែមទាំង២ប្រភេទ ។ ហេតុនេះ ហើយអ្នកអាចចាប់ផ្តើមពិសារផ្លែទាប ដើម្បីការពារសុខភាពរបស់អ្នក ។



**សុខភាពបេះដូង**

ជាការពិតណាស់ ផ្លែទាបសំបូរទៅដោយវីតាមីន B6 អាចជួយការពារការកើនឡើងនៃ homocysteine ដែលទាក់ទងនឹងជំងឺបេះដូង និងជំងឺដាច់សរសៃឈាម ខួរក្បាល ។

**ជួយរក្សាកម្រិតវីតាមីនB ផ្សេងទៀតនៅក្នុងរាងកាយ**

ផ្លែទាបនេះក៏សំបូរទៅដោយវីតាមីន B2 ដែលមានតួនាទីជួយរក្សាកម្រិតវីតាមីនជាច្រើននៅក្នុងរាងកាយ ព្រោះវាមានសារៈសំខាន់ជួយឱ្យមុខងារក្នុងរាងកាយមានភាពរីកចម្រើនលូតលាស់បានល្អ ។

**ជួយកាត់បន្ថយកម្រិតសម្ពាធឈាម**

ផ្លែទាបក៏មានផ្ទុកនូវសារធាតុប៉ូតាស្យូមដែលអាចជួយរក្សាកម្រិតជាតិស្ករក្នុងឈាម ព្រោះវារក្សាកម្រិតជាតិសូដ្យូមនៅក្នុងសរីរាង្គ ។

**ការពារពីជំងឺហឺត**

ផ្លែទាបមិនត្រឹមតែសំបូរជាតិប៉ូតាស្យូមតែមួយមុខប៉ុណ្ណោះទេ តែវាក៏សំបូរទៅដោយសារធាតុម៉ាញ៉េស្យូម, វីតាមីន C និង B6 ។ វីតាមីន C អាចជួយកាត់បន្ថយអត្រាគ្រោះថ្នាក់នៃជំងឺហឺត ព្រោះវាជួយប្រឆាំងនឹងអុកស៊ីតកម្ម ព្រមទាំងជាសារធាតុប្រឆាំងនឹងការរលាក ។ ម្យ៉ាងវិញទៀត វីតាមីនB6 អាចជួយការពារការរលាកបំពង់ទងសួត ។

**ជួយរក្សាសុខភាពក្រពេញទីរ៉ូអ៊ីត**

តទៅទំព័រទី ២៣

# ប្រទាលកន្ទុយក្រពើមានគុណប្រយោជន៍ ចំពោះអ្នកជំងឺទឹកនោមផ្អែម





ប្រទាលកន្ទុយក្រពើជាឱសថធម្មជាតិមួយប្រភេទដែលប្រសិទ្ធភាពខ្ពស់ក្នុងការថែបំប៉នសុខភាពស្បែក។ តែការសិក្សាថ្មីៗនេះបានបង្ហាញថា ប្រទាលកន្ទុយក្រពើ ក៏មានប្រសិទ្ធភាពក្នុងការព្យាបាលជំងឺទឹកនោមផ្អែមបានយ៉ាងល្អផងដែរ។ សូមបញ្ជាក់ជូនថា ជំងឺទឹកនោមផ្អែមជាប្រភេទជំងឺខូចប្រព័ន្ធភាពស៊ាំមួយដែលអ្នកអាចបង្ការវាបានតាមរយៈការ ការហាតប្រាណឱ្យបានទៀងទាត់ និងការទទួលទានអាហារសុខភាពជាប្រចាំ។

ហើយក្រុមអ្នកជំនាញផ្នែកសុខភាពបានអះអាងថា ប្រសិនបើលោកអ្នកអាចបន្ថែមប្រទាលកន្ទុយក្រពើក្នុងរបបអាហារប្រចាំថ្ងៃរបស់លោកអ្នកបាន គឺវាមានប្រសិទ្ធក្នុង ការទប់ស្កាត់ជំងឺទឹកនោមផ្អែម ហើសម្រាប់អ្នកមានជំងឺទឹកនោមផ្អែមហើយ វាក៏អាចជួយរក្សាអ្នកជំងឺទឹកនោមផ្អែមនោះ ឱ្យស្ថិតក្នុងលក្ខខ័ណ្ឌមួយដែលអាចគ្រប់គ្រងបានដែរ ដោយគ្រាន់តែញ៉ាំទឹកប្រទាលកន្ទុយក្រពើក្នុងចន្លោះពី ៥-១៥មីលីលីត្រក្នុងមួយថ្ងៃ ឬញ៉ាំវាស្រស់តែម្តងក្នុងបរិមាន៣ស្លាប់ព្រាកាហ្វេក្នុងមួយថ្ងៃ។

ខាងក្រោមនេះជាគុណប្រយោជន៏មួយចំនួននៃប្រទាលកន្ទុយក្រពើចំពោះជំងឺទឹកនោមផ្អែមៈ

-សម្បូរដោយជាតិសរសៃដែលអាចបន្ថយកម្រិតជាតិស្ករក្នុងរាងកាយបានយ៉ាងមានប្រសិទ្ធភាព។

-សម្បូរដោយប្រូតេអ៊ីន និងកាបូអ៊ីដ្រាតដែលអាចកាត់បន្ថយកម្រិតជាតិស្ករ។

-អាចកាត់បន្ថយកម្រិតជាតិស្ករក្នុងឈាមបាន ៥០% ក្នុងរយៈពេល ២ ខែ។

-អាចលាងសម្អាតចរន្តឈាម និងកម្ចាត់ជាតិស្ករដែលលើសក្នុងចរន្តឈាមបាន។

-មានសារជាតិប្រឆាំងអុកស៊ីតកម្មដ៏រឹងមាំដែលអាចប្រឆាំងទៅនឹងការរលាកនិងរបួសផ្សេងៗដែលបណ្តាលមកពីជំងឺទឹកនោមផ្អែម។

-អាចធ្វើឱ្យមានរំញោចក្នុងការបញ្ចេញអាំងស៊ុយលីន។

-ជាឱសថធម្មជាតិក្នុងការព្យាបាលជំងឺទឹកនោមដោយគ្មានផលប៉ះពាល់អ្វីទាំងអស់សម្រាប់សុខភាព៕

តមកពីទំព័រទី ២០ និយាយពីអ្នកក្រ និងអ្នកមាន...

ដល់កូនជាមិនខាន...តែបើខ្លួនបាត់បង់ការងារនោះថ្ងៃណាមួយការធានារ៉ាប់រងជីវិតក៏នឹង-ដាច់ទៅបាត់ដូចគ្នា ដូច្នេះតើត្រូវគិតយ៉ាងណា? យើងយល់ថាៈ អេមី មានអាយុតិចមានសុខភាពនៅរឹងប៉ឹងអាចមានលទ្ធភាពរកការធានាជីវិតបានចំនួនយ៉ាងហោចណាស់៥០ម៉ឺនដុល្លាទុកដាក់ឱ្យកូនខ្លួនបានយ៉ាងប្រសើរណាស់ទៅហើយលុយ៤ម៉ឺននេះ គ្រប់សម្រាប់តែធ្វើបុណបូជាសពជាចុងក្រោយតែប៉ុណ្ណោះ ដូច្នេះ អេនី ត្រូវមានការធានាជីវិតជាឯកជនមួយទៀត ដោយបង់តម្លៃប្រចាំខែតិចជាង១០០ដុល្លា ដែល អេនី អាចធ្វើបានដោយមិនចាំបាច់ប្រឹងទប់ទល់ក្នុងជីវភាពប្រចាំថ្ងៃបាន។ ចំណែកបុរស ឬស្ត្រីដែលមានអាយុចាប់ពី៤៥-៥០ឆ្នាំឡើងទៅនឹងមានការលំបាកនឹងទិញ ការធានារ៉ាប់រងជីវិតរដ្ឋគេជួយសម្រាលតែខាងចំណាយសុខភាពតែប៉ុណ្ណោះ ការធានារ៉ាប់រងជីវិតកីរតខ្ពស់ត្រូវបង់ប្រាក់ប្រចាំខែក៏ខ្ពស់រត់មិនរួចទេ ត្រូវរកការធានាណាដែលមានតម្លៃទាប ដូចជាត្រឹមតែ១០ម៉ឺនដុល្លាជាដើមក៏បានដែរ។ តែទោះជាយ៉ាងនេះក៏ដោយក្តី ក៏មានក្រុមហ៊ុនខ្លះ ទទួលយកការធានារ៉ាប់រងសម្រាប់ចំណាយចុងក្រោយបង្អស់ដែរ បានសេចក្តីថាចំណាយសម្រាប់បូជាសព ដូចជាចាស់អាយុ៥០ឆ្នាំអាចទិញការធានាបានចំនួន១០ពាន់ ក្នុងចំណាយប្រចាំខែ៥០ដុល្លា ឬក៏ទិញបាន២០ពាន់ ក្នុងចំណាយ ១០០ក្នុង១ខែ ដោយមិនមានសួររឿងសុខភាពទេ ដូច្នេះឃើញថា បើធ្វើបានប៉ុណ្ណេះ ក៏បន្ទូរបន្ទុកកូនចៅបាន១ផ្នែកធំដែរ...បើប្រាថ្នាសន្សំដោយខ្លួនឯងក្នុង១ខែសន្សំ១០០ដុល្លា ឱ្យបាន២ម៉ឺនក្នុងរយពេល១០ឆ្នាំ ប្រាកដជាធ្វើមិនបានទេ ហើយក៏មិនធានាថា ចាស់ៗនឹងអាយុវែងដល់១០ឆ្នាំទៅមុខផង។

យើងសន្សំមិនបានតែងតែនាំគ្នានិយាយអាក្រក់ពីការធានាជីវិតធានាទ្រព្យសម្បត្តិថាជាក្រុមហ៊ុនមិនគួរឱ្យជឿបាន ឬក៏ជាអ្នកបោកប្រាសជាហេតុបានធ្វើឱ្យយើងខូចខាតបង់ច្រើនណាស់ហើយ...ដូច្នេះសូមពិចារណាសារជាថ្មីឡើងវិញ...ពីព្រោះគ្រោះកាចអាចនឹងកើតគ្រប់ពេលវេលា បើយើងមិនការពារវាជាមុនយើងមុខតែនឹងស្តាយក្រោយជាមិនខានទេ...តែបើយើងការពារជាមុនទៅវិញ យើងមុខជាមិនក្រដោយសារកិច្ចការពារខ្លួននោះទេ៕

(**នៅមានតទៅលេខក្រោយទៀត**)

តមកពីទំព័រទី ២២ ផ្លែទាបតែ១ផ្តល់នូវអត្ថប្រយោជន៍លើសពីការស្មាន

អរម៉ូនទីរ៉ូអ៊ីតមានសារៈសំខាន់ខ្លាំងណាស់ក្នុងការជួយការពារសុខភាពក្រពេញទីរ៉ូអ៊ីត។

**ជួយផ្តល់ថាមពលឱ្យរាងកាយ**

ស្ករត្រូវបានបំលែងទៅជាថាមពលដោយសារជំនួយពីសារធាតុ Thiamin ដ៏សំខាន់។ នេះជាមូលហេតុដែលរាល់ពេលអ្នកអស់កម្លាំង អ្នកគួរតែពិសារផ្លែទាប ព្រោះវាសំបូរទៅដោយសារធាតុ Thiamin។

**ជួយឱ្យឆ្អឹងរឹងមាំ**

ប្រសិនបើអ្នកចង់ឱ្យសុខភាពឆ្អឹងរឹងមាំល្អ អ្នកត្រូវទទួលទានជាតិកាល់ស្យូម និងម៉ាញ៉េស្យូម។ ហើយផ្លែទាបនេះសំបូរទៅដោយសារធាតុខនិជទាំងនេះ។

**ជួយកាត់បន្ថយកម្រិតជាតិកូឡេស្តេរ៉ុល**

ផ្លែទាបក៏សំបូរទៅដោយសារធាតុ Niacin ដែលជាធម្មតាជាវីតាមីន B ហើយវាជួយបង្កើនសារធាតុកូឡេស្តេរ៉ុលល្អៗឡើងមក។

**ការពារពីបញ្ហាកើតមានចំពោះទារកក្នុងផ្ទៃ**

សារធាតុ Folate ឬវីតាមីន B9 ផ្តល់អត្ថ-ប្រយោជន៍ដល់គភ៌ ក៏ដូចជាជួយការពារបញ្ហាបំពង់ប្រសាទរបស់ទារក។

**ជួយរក្សាសុខភាពសក់ និងស្បែក**

ប្រសិនបើអ្នកចង់មានសម្រស់ស្បែក និងសក់ស្រស់ស្អាត អ្នកគួរតែទទួលទានផ្លែទាបឱ្យបានច្រើន ព្រោះវាសំបូរទៅដោយវីតាមីនA។ ហើយអ្នកក៏អាចប្រើក្រែមចម្រាញ់ពីផ្លែទាបលាបលើបញ្ហាស្បែក



ដើម្បីព្យាបាល។

**ជំនួយភ្នែក**

វីតាមីន A ក៏អាចជួយការពារភ្នែករបស់អ្នកបានផងដែរ ព្រោះវាមានសារធាតុប្រឆាំងនឹងអុកស៊ីតកម្ម។ ហើយវាក៏អាចជួយការពារគ្រាប់ភ្នែកពីវិទ្យុសកម្មផងដែរ។

**ជួយការពារពីជំងឺខ្វះឈាម**

ផ្លែទាបនេះផងដែរក៏សំបូរទៅដោយជាតិដែកដែលជាសារធាតុខនិជដ៏សំខាន់សម្រាប់បង្កើតកោសិកាឈាមក្រហម។ ដូច្នេះប្រសិនបើអ្នកពិសារវាឱ្យបានទៀងទាត់ នោះអ្នកនឹងមិនអាចប្រឈមមុខនឹងបញ្ហាខ្វះឈាមទៀតឡើយ៕ **ដោយៈ ដារ៉ា**

# ឧទ្យានជាតិព្រះសីហនុរាម





●●●ឧទ្យានជាតិព្រះសីហនុរាមមានទីតាំងស្ថិតនៅទិសនិរតីនៃព្រះរាជាណាចក្រកម្ពុជា រវាងកោះថ្មី និងក្រុងព្រះសីហនុ មានចំងាយប្រហែល១៨គីឡូ ម៉ែត្រពីក្រុងព្រះសីហនុ និងមានចម្ងាយប្រមាណ១៩៤ គីឡូម៉ែត្រពីរាជធានីភ្នំពេញ តាមផ្លូវជាតិលេខ៤។ ឧទ្យានជាតិនេះស្ថិតនៅក្នុងស្រុកព្រៃនប់ក្នុងខេត្តព្រះសីហនុ ហើយមានទីតាំងខាងជើងជាប់នឹងផ្លូវជាតិលេខ៤ ឃុំរាម ឃុំអូរឧកញ៉ា ហេង ដែលស្ថិតនៅជាប់ជួរភ្នំ ។ ខាងកើតជាប់ឃុំបត់ត្រង់ ភូមិអុង ក្នុងឃុំរាម និងឈូងសមុទ្រថៃ ។ ខាងលិចជាប់នឹងឃុំបឹងតាព្រហ្ម និងឃុំអូរជ្រៅ ។ ខាងត្បូងជាប់នឹងឈូងសមុទ្រថៃ ។

ឧទ្យានជាតិរាមដែលមានផ្ទៃដី២១.០០០ហិកតានេះ ក្រៅពីនៅជាប់មាត់សមុទ្រ ក៏ស្ថិតនៅក្នុងតំបន់ជួរភ្នំក្រវាញ ដោយប្រជុំភ្នំនៅតំបន់ទាំងនោះ ស្ថិតនៅរាយប៉ាយពេញតំបន់ ហើយមានរយៈកម្ពស់ប្រែប្រួលពី ៥០ ម៉ែត្រ ដល់២៨៤ម៉ែត្រ ។ ដោយមានភ្នំតូចធំ និង កោះចំនួន ២ គឺកោះថ្មី និងកោះសេះ ។ ព្រៃឈើទ្រុបទ្រុលតាមភ្នំព្រៃកោងកាងខៀវ ស្រងាត់ និងស្មៅសមុទ្រតាមឆ្នេរសមុទ្រសុទ្ធតែជាកន្លែងរស់នៅរបស់សត្វផ្សេងៗជាច្រើនប្រភេទ ។

ឆ្នេរខ្សាច់មានទេសភាពល្អប្រណីតលំអដោយខ្សាច់ម៉ដ្ឋ ដើមស្វាវធំៗ ទឹកសមុទ្ររំជួលតិចៗ និងកូនកោះជិតៗឆ្នេរដែលធ្វើឱ្យឧទ្យានជាតិនេះជាកន្លែងបម្រើឱ្យវិស័យទេសចរណ៍ ហើយអាចរកប្រាក់ចំណូលជូនជាតិ និងថែមទាំងបម្រើឱ្យផងដែរ លើផ្នែកវិទ្យាសាស្ត្រដូចជាការស្រាវជ្រាវឱសថសាស្ត្រ និងអភិវឌ្ឍកសិកម្មជាដើម ។ ឧទ្យានជាតិនេះ បានបើកនៅថ្ងៃទី០១ ខែវិច្ឆិកា ឆ្នាំ១៩៩៣ ដែលមានផ្ទៃដី២១០០០ ហិចតា ដែលក្នុងនោះ ១៥០០០ហិចតា ជាដីគោកតាមឆ្នេរសមុទ្រ និង៦០០០ហិចតា ជាផ្ទៃទឹកសមុទ្រ។ ឧទ្យានជាតិនេះមាននូវឆ្នេរដ៏ស្រស់ស្អាត ចំការដូង ដើមកោងកាង ព្រៃភ្នំ និងសត្វស្លាបជាច្រើនប្រភេទ ៕



